# ខ្មែរប៉ុស្តិ៍ ស.រ.អា

# KhmerPost USA

Printing The Cambodian World News

VOL. 05 ISSUE 86 July 01st - 14th, 2011

សុបិន : (267) 253-3947, សែម : (781) 244-0522

MASSACHUSETTS
217 APPLETON ST.
LOWELL, MA 01852
PENNSYLVANIA
438 LINDLEY AVE.
PHILADELPHIA, PA 19120
RHODE ISLAND
NEW JERSEY


អាធិការរឿង — ទំព័រ



## 2011 Independence Day Celebration

## Happy July 4th !



**ថ្ងៃទី ០៤ កក្កដា ១៧៧៦ គឺជាថ្ងៃប្រកាសឯករាជ្យរបស់ សហរដ្ឋអាមេរិក**

"We...solemnly Publish and Declare, that these United Colonies are, and of Right ought to be, Free and Independent States." - Declaration of Independence IN CONGRESS, July 4, 1776.

តទៅទំព័រទី ០៩

## Lynn Mass: Cambodian-American is Heading for City Council-at Large Election in Fall

ខ្មែរ-អាមេរិកាំងម្នាក់ឈ្មោះ ហុង ណេត ទើបនឹងប្រកាសឈរឈ្មោះជាបេក្ខជនក្រុមប្រឹក្សាសាលាក្រុងលីន រដ្ឋម៉ាសាឈូសែត សម្រាប់ការបោះឆ្នោតនៅខែកញ្ញា ឆ្នាំ២០១១ ខាងមុខ ។ នេះជាលើកទីពីរក្នុងរយៈពេល២ឆ្នាំ បន្ទាប់ពី សម មាស ដែលឈរឈ្មោះជាបេក្ខជនសភាអាមេរិកាំង ជាសញ្ញាថា ខ្មែរអាមេរិកាំង កំពុងចាប់អារម្មណ៍ពីនយោបាយ និងអនាគតនៃលំនឹងសហគមន៍កាន់តែខ្ពស់ឡើងនៅក្នុងតំបន់ ។ ថ្វីត្បិតតែលោក ហុង ណេត សង្ឃឹមលើសន្លឹកឆ្នោតរបស់សហគមន៍ខ្មែរ ដែលមានចំនួនដ៏ច្រើននៅ លីន ក៏ដោយ ក៏ការជាប់ឆ្នោតពុំមែនផ្អែកទៅលើគុណសម្បត្តិជាដើមកំណើតខ្មែរតែមួយមុខនោះទេ ។ សុបិន សូមបង្ហាញលោកអ្នកអានថា ហុង ណេត ជានរណា ? ជាភាសាអង់គ្លេសដូចតទៅ :

*Soben Pin*

Over 17,000 Cambodian residents in Lynn Mass now has its first Cambodian-American candidate, Hong Net, entered the race for City Council-at-Large for upcoming election in fall 2011.



Hong Net is the father of two, Anna, age 11 and William, age 9, and a husband of Tharva. He migrated to the U.S. as the result of Cambodian War and settled in South Hadley, *(Continued on page 03)*

## បុណ្យបញ្ចុះសីមាវត្តថ្មីនៅវូដប្រ៊ីឌ

**ដោយ : ពិន សំខុន**

**រដ្ឋវឺជីនា** : នៅទីក្រុងតូចមួយនៅចម្ងាយកន្លះម៉ោងខាងត្បូងរដ្ឋធានីវ៉ាស៊ីនតុន ដែលមានឈ្មោះថា ក្រុងវូដប្រ៊ីឌ (Woodbridge) បានធ្វើពិធីបញ្ចុះសីមាសម្ពោធវត្តថ្មីមួយដែលគេបានដាក់ឈ្មោះថា "វត្តពុទ្ធវង្ស ថេរវាទ" Watt Buddhavongsa Theravada ។ នាទីក្រុងដែលមានប្រជាពលរដ្ឋមិនដល់១០០គ្រួសារផង **(តទៅទំព័រទី ០៥)**



# GATEWAY FAMILY DENTAL

NOW OPENED AT GATEWAY CENTER II (978) 455-5044

151 WARREN STREET, SUITE 120 LOWELL, MA 01852 (Same building as Social Security/near the courthouse)



**DR. SERENA B. CHUOP**

Dr. Serena B. Chuop was born in Cambodia. She received her Bachelor of Science from Boston University and went on to graduate from Boston University Goldman School of Dental Medicine in the year 2000. For over 10 years, she has been in private practices providing all aspects of General Dentistry. Dr. Chuop has opened a brand new state of the art dental practice that includes digital x-ray, paperless patient chart system, and brand new dental equipments.




**WE PROVIDE ALL SERVICES INCLUDING:** **យើងផ្តល់នូវសេវាដូចខាងក្រោមនេះ**

- CLEANING
- FILLINGS
- BONDINGS
- COSMETIC DENTISTRY
- CROWNS/BRIDGES
- DENTURES
- IMPLANTS
- EXTRACTIONS
- TEETH WHITENING
- VENEERS
- EMERGENCY DENTAL TREATMENT
- ROOT CANAL TREATMENT
- DENTAL SERVICES TO CHILDREN

- សំអាតធ្មេញ
- បំពេញធ្មេញប្រហោង
- ថ្នាំសំរាប់ការពារធ្មេញ
- ធ្មេញពាក់ជុំនួសធ្មេញដែលបាក់
- ក្រាសធ្មេញពាក់
- ដាំធ្មេញតាមរន្ធធ្មេញចាស់
- ដកធ្មេញ
- ធ្វើធ្មេញឱ្យសស្អាត
- វ៉ែរនីស្រោបធ្មេញ
- ព្យាបាល និងការពារធ្មេញជាទៀងទាត់
- ព្យាបាល ឫសថ្គាមធ្មេញ
- សេវាព្យាបាលសំរាប់កុមារ

www.gatewayfamilydental.com

MOST DENTAL INSURANCES ACCEPTED
INCLUDING MASSHEALTH FOR KIDS
FINANCING AVALIABLE

យើងទទួលនូវគ្រប់ អ៊ិន ស៊ូរិន
Masshealth for Kids
យើងសំរួលការបង់ថ្លៃព្យាបាលប្រចាំខែ

CALL FOR YOUR FREE CONSULTATION
(978) 455-5044



# Massachusetts Council on Compulsive Gambling

*We understand the problem. We can help.*



## ក្រុមប្រឹក្សារដ្ឋម៉ាសាឈូសេតសំរាប់ការញៀនល្បែងស៊ីសង

"ប្រសិនបើលោកអ្នក ឬនរណាម្នាក់ដែលអ្នកស្គាល់ មានបញ្ហាញៀនល្បែងស៊ីសង សូមទូរស័ព្ទមកលេខ ខាងក្រោម អាចជួយជាអ្នកសម្ងាត់ ហើយ សួររកសៀវភៅសម្រាប់ឱ្យអាចជួយខ្លួនឯងបាន ជាភាសាខ្មែរដោយឥតគិតថ្លៃ"

**1-857-383-3577**

ជំហានដំបូងរបស់អ្នកឆ្ពោះទៅកាន់ការផ្លាស់ប្តូរ

www.asianproblemgambling.org

(Continued from page 01 )

# Cambodian-American is...

MA with his adopted parents in 1982. He graduated from Holyoke Catholic High School in 1988, and earned a Bachelor of Science from UMass in Amherst in 1992.

Hong Net has worked most of his professional life with families and children. He is currently working as a child support enforcement officer at the Massachusetts Department of Revenue, formerly served as a youth and family case manager in Lynn at the South Cove Community Health Center, assisted Youth Soccer Team in Lynn, and helped found the International Language Center to teach ESL and computer skills to over 800 students.



Net believes in local government is strongest when all voices are included in the process of decision making. His campaign focuses around Education, Public Safety, Unity, and Economic Development. He believes new program should be created such as Bilingual Parents Task Force that will help to strengthen the community to raise "well-rounded children" by creating arts and recreational programming. Net also would like to create "cross-cultural communication" training for police officers and after school jobs and programs that will increase public safety.

Net told KhmerPost USA that when he is not working, he volunteered his time working with children, youths, and families. He spent his summer days cleaning up parks and playground with Khmer American Youth in Action and Street Outreach Worker, Antonio Guitierrez. On every other Tuesday, he spent half day giving away foods to needy families through Sacred Heart Church sponsorship. During the Cambodian New Year season, he helped planning the Cambodian New Year outdoor celebration in Lynn commons that brought nearly 1,000 people to participate this year. He is also an Advisory Board member of Youth Empowerment and Success (YES) in Lynn.

Net's first Campaign Kick-Off Reception was on June 13th, 2011 at the Old Tyme Italian Cuisine in Lynn. Over 200 people came to show their supports, "many Cambodians said they will make sure to register to vote" said Net. He hopes to work with the city council, the mayor, and the citizens of Lynn to make the city a better place.



## HELP WANTED

KhmerPost USA is seeking local contributed writers from Lowell area in both Khmer & English. No previous journalism experience is required. Since 2008, KhmerPost Newspaper has been incepted and served Cambodian communities in the East Coast of United States from Pennsylvania, to New Jersey, to Rhode Island, and now, since August 2010, we have been serving the State of Massachusetts. We are now covering entirely Lowell, Lynn, Revere, and will expand to Fall River. To help improve our content, we will need the participation from your community by feeding us the information about what's happening within your neighborhoods. Whether you are a college student, afull-time mom, or working professional, who just want to share news and information from your community to the rest of Cambodian communities, please don't hesitant to contact us.


Our Contact:
Roger Samkhon Pin
Publisher & Editor-in-Chief
pinsamkhon@gmail.com
or by Mail
438 Lindley Avenue.
Philadelphia, Pa 19120

# ចៅក្រមសម្រេចឱ្យ ស៊ុម សាក់ ចាញ់ក្តី

COURT OF COMMON PLEAS OF PHILADELPHIA
ORPHANS' COURT DIVISION

In Re: Wat Phreasbuddhapratheanphor, Inc.,
A Nonprofit Corporation
O.C. No. 462 NP of 2011
Control No. 115114

FINAL ORDER

AND NOW, this 2nd day of June, 2011, following an evidentiary hearing, it is hereby ORDERED that the Plaintiff's demand to eject Defendant, Somsak Suwannarat, is hereby GRANTED and he is Ordered to vacate the Buddhist Temple property located at 1732 Mifflin Street, Philadelphia, PA within thirty (30) days of the date of this Order.

It is further ORDERED and DECREED that Counts I, II and III of the counterclaims are DENIED for lack of credible evidence.

BY THE COURT:

John W. Herron, J.

ដោយ : ពិន សំខុន

**ហ្វីឡាដែលហ្វៀ** : វិវាទនៅសាលាក្តីរវាងអតីតចៅអធិការវត្តព្រះពុទ្ធប្រទានពរឈ្មោះ ស៊ុម សាក់ ស៊ូវ៉ាន់រ៉ាត ដែលទាមទារថា វត្តនៅ 1732 Mifflin st. ជាសម្បត្តិរបស់ខ្លួនទល់នឹងគណៈកម្មាធិការវត្ត បានមកដល់ទីបញ្ចប់ដោយចៅក្រមចេញលិខិតបញ្ជាឱ្យ ស៊ុម សាក់ ចាកចេញពីបរវេណវត្តដែលលោកស្នាក់អាស្រ័យ រហូតមកដល់នឹងពេលនេះឱ្យបានមុនថ្ងៃទី២ ខែកក្កដា ឆ្នាំ២០១១ ។ តែលោក ស៊ុម សាក់ នៅមានសិទ្ធិបន្តបណ្តឹងទៅឧទ្ធរណ៍បាន ។



គេអាចអានក្នុងរបាយការណ៍តុលាការថ្ងៃទី២ ខែមិថុនា ឆ្នាំ២០១១ យោងឱ្យមានសេចក្តីសម្រេចខាងលើថា "ចុងចោទ ស៊ុម សាក់ បានបង្កើតវត្តទី១ នៅថ្ងៃទី២ ខែមីនា ឆ្នាំ២០០២ នៅអាស័យដ្ឋាន 1532 South Carlirte Street ហើយវត្តនេះ បានត្រូវផ្ទេរទៅអាស័យដ្ឋាន 1732 Mifflin Street (សព្វថ្ងៃនេះ) កាលពីថ្ងៃទី១៥ ខែមករា ឆ្នាំ២០០៤ ។ វត្តទី១ ទិញក្នុងឈ្មោះលោក ស៊ុម សាក់ រីឯវត្តទី២ ទិញក្នុងឈ្មោះគណៈកម្មាធិការវត្ត ក៏ប៉ុន្តែចម្លើយចំពោះវិធីរកប្រាក់មកទិញឱ្យបានវត្តទាំងពីរមិនបានបង្ហាញភាពច្បាស់លាស់ទេ ។ ក៏ប៉ុន្តែទោះជាយ៉ាងនេះទៅហើយក្តី ក៏មាត្រា៥៤ និង ៥៥ នៃលក្ខន្តិកៈសរសេរដោយលោក ស៊ុម សាក់ ខ្លួនឯង ពុំបានអនុញ្ញាតឱ្យនរណាដែលបានដាក់អំណោយទៅហើយ អាចដកយកមកវិញបាននោះទេ ។

ទំនាស់រហូតដល់មានការប្តឹងពីសំណាក់គណៈកម្មាធិការវត្ត បណ្តេញឱ្យលោក ស៊ុម សាក់ ចាកចេញពីការស្នាក់អាស្រ័យនៅវត្ត គឺបន្ទាប់ពីលោកលាចាកសិក្ខាបទនាថ្ងៃទី៩ ខែធ្នូ ឆ្នាំ២០០៧ តែនៅតែប្រកាន់តំណែងជាម្ចាស់ផ្ទះ ជាចៅអធិការ និងនៅជាប្រធានវត្តដដែល បើទោះបីជាប្រធានវត្តថ្មី បានត្រូវប្តូរទៅព្រះតេជគុណ សុទ្ធ សារឹម ទៅហើយក្តីក៏ដោយ ។ នៅលើចំណុចនេះ ចៅក្រមបានរកឃើញថា លោក ស៊ុម សាក់ បានបាត់ចំណេះខ្លួនឯង ពីព្រោះលក្ខន្តិកៈវត្តនៅមាត្រា ១០.១ និយាយថា ប្រធានគណៈកម្មាធិការត្រូវជាព្រះសង្ឃ ហើយនៅមាត្រាទី៩.៥ ក៏បញ្ជាក់ច្បាស់បន្ថែមថា ព្រះគ្រូចៅអធិការគឺជាប្រធាននៃគណៈកម្មាធិការនាយក ។

យើងពុំទាន់ឮប្រតិកម្មពីលោក ស៊ុម សាក់ នៅឡើយទេ បន្ទាប់ពីដីការបានចេញផ្សាយជាសាធារណរួចហើយ ក៏ប៉ុន្តែថ្មីៗនេះ ព្រះគ្រូចៅអធិការប្រធានវត្ត សារិម សុទ្ធ ដែលទើបឈ្នះក្តី បានលាចាកសិក្ខាបទកាលពីថ្ងៃទី៥ ខែមិថុនា ហើយចៅអធិការថ្មីមួយអង្គទៀត បានត្រូវតែងតាំងឡើង ព្រះនាមពុទ្ធញាណោ ហ៊ុន សិទ្ធី ។ ព្រះអង្គបានមានសង្ឃដីការប្រាប់ខ្មែរប៉ុស្តិ៍



ថា "រឿងរ៉ាវទាំងឡាយ ធ្វើឱ្យវត្តព្រះពុទ្ធប្រទានពរធ្លាក់ប្រជាប្រិយភាពយ៉ាងខ្លាំងដូច្នេះជាឱកាសសម្រាប់ពង្រឹងសាមគ្គីភាពឱ្យបានរឹងមាំឡើងវិញ ទើបស្មោះភាពមានវិញបាន "។

លោក ត្រែ ហ៊ល អនុប្រធានវត្ត បានដកដង្ហើមធូរចិត្តជាមួយនឹងគណៈកម្មការវត្ត ដោយបានឃើញស្រមោលនៃទីបញ្ចប់វិវាទបានមកដល់យ៉ាងវិជ្ជមាននេះ ៕

តមកពីទំព័រទី 01

## បុណ្យបញ្ចុះសីមាវត្តថ្មីនៅវូដប្រ៊ីឌ...

តែមនុស្សប្រមាណ៥០០នាក់ បានចូលរួមជាមួយព្រះសង្ឃមកពីវត្តញូជើស៊ី, ផេនស៊ីវេនា, វៀស៊ីនា, ម៉ារីឡែន យ៉ាងអឹកធិក រីករាយដោយការជួបជុំសហគមន៍ក្នុងឱកាសដ៏តម្រនេះ ។

នេះជាវត្តទីពីរដែលស្ថិតនៅផ្នែកខាងត្បូងនៃរដ្ឋធានីរបស់ហេរដ្ឋអាមេរិក បន្ទាប់ពីវត្តទី១ ឈ្មោះវត្តកម្ពុជាក្រោម មានភាពរអាក់រអួលដំណើរការណ៍ច្រើនឆ្នាំដោយសារអាជ្ញាប័ណ្ណមិនបានបើកសិទ្ធិឱ្យមនុស្សប្រមូលផ្ដុំគ្នាច្រើននៅទីនោះបាននេះម្យ៉ាង ហើយម្យ៉ាងទៀតមានសមាជិកសហគមន៍ជាច្រើននិយាយថា តាំងពីព្រះគ្រូម្នាក់ឯង ពុំមានប្រមូលគ្នាជាផ្សារខ្មែរទេ ក៏ប៉ុន្តែក្រុមយៀកណាម គេមានមជ្ឈមណ្ឌលពាណិជ្ជកម្មដ៏ធំមួយឈ្មោះ "អេដែន" ដែលបង្កើតឡើងដោយពាណិជ្ជករប្រឆាំងនឹងកុម្មុយនីស្តយ៉ាងជ្រាលជ្រៅ ។

វូដប្រ៊ីឌ ជាក្រុងដ៏តូចប្រកបដោយផ្លូវធំៗជាច្រើនឆ្លងកាត់ ហើយវត្តពុទ្ធវង្ស ក៏មានទីធ្លាធំទូលាយស្រឡះមុខមាត់ កំពុងតែរៀបចំរចនាសម្ព័ន្ធគ្រប់គ្រងរបស់ខ្លួន ។ សម អឿន ជាប្រធានបណ្ដោះអាសន្នដំបូងជាមួយនឹងស្ថាបនិកត្រឹះប្រមាណ២០នាក់ ចូលរួមកាត់អំបោះបញ្ចុះសីមារជាកិច្ចសម្ពោធទីសក្ការៈបូជារបស់សាធារណជន


ម្ចាស់ស្រុក និងឯកឧត្តម ហែម ហេង


ប្រធាន សម អឿន (រូបកណ្ដាល ) និងគណកម្មការវត្ត


ហែរប្រទក្សិណ

ចៅអធិការចាស់បានចូលទីវង្គត់ទៅប៉ុន្មានឆ្នាំចុងក្រោយនេះវត្តកម្ពុជាក្រោមពុំមានលំនឹងគ្រប់គ្រងមាំទាំទេ ។ នៅមានវត្តដ៏ធំជាង គេបង្អស់ក្នុងសហរដ្ឋអាមេរិកមួយទៀត ដែលស្ថិតនៅក្នុងរដ្ឋម៉ារីឡែន ភាគខាងជើងនៃរដ្ឋធានីដដែលជាទីដែលប្រមូលផ្ដុំពុទ្ធបរិស័ទក្នុងតំបន់ឱ្យ មកប្រារព្ធពិធីបុណ្យតានយ៉ាងកកកុញរៀងរាល់លើកក្នុងមួយឆ្នាំៗ។

តំបន់វ៉ាស៊ិនតុនឌីស៊ី រួមមានរដ្ឋម៉ារីឡែន, រដ្ឋវៀស៊ីនៀ និងរដ្ឋញូជើស៊ី មានប្រជាពលរដ្ឋដើមកំណើតខ្មែរតិចជាង៥០០០នាក់ប៉ុណ្ណោះ ក៏ប៉ុន្តែជាតំបន់ដែលសម្បូរអ្នកមានចំណេះជីវភាពមាំមួន និងប្រកបរបរជាអ្នកធ្វើការយកប្រាក់ខែ ឬក៏ជាម្ចាស់នៃសហគ្រាសតែ



ជាពុទ្ធបរិស័ទកាលពីរសៀលថ្ងៃអាទិត្យ ទី២០នេះប្រកបដោយភាពលះបង់ខ្ពស់ ។ ពួកគេសង្ឃឹមថា បន្តិចទៀតនឹងអាចតែងតាំងចៅអធិការវត្តបានជាប្រាកដ ។ អតីតចៅអធិការវត្តព្រះពុទ្ធប្រទានពរ ដែលទើបចាកសិក្ខាបទនាឱកាសឈ្នះក្ដីលើអតីតចៅអធិការជំនាន់មុនដែលចង់យកវត្តធ្វើជាសម្បត្តិផ្ទាល់ខ្លួន ក៏មានវត្តមានយ៉ាងសកម្មនៅទីនោះដែរ។

វត្តមានរបស់លោកឯកអគ្គរាជទូតខ្មែរ ប្រចាំទីក្រុងវ៉ាស៊ិនតោន ហែម ហេង នាឱកាសសម្ពោធវត្តពុទ្ធវង្សជាមួយពលរដ្ឋម្ចាស់ស្រុកជាច្រើននៅទីនោះ បានញ៉ាំងឱ្យពិធីបុណ្យនាថ្ងៃនោះ មានសារសំខាន់ដ៏គួរឱ្យចង់ចាំមួយថា "សេរីភាព និងភាពរុងរឿងមិនអាចកើតឡើងដោយគ្មានសីលធម៌នោះទេ" យ៉ាងណាមិញគេត្រូវដោះមួកគោរពទីសក្ការៈថ្មីមួយទៀត នៅពេលគេឆ្លងខ្លោងទ្វារចូលក្នុងវត្តនៅពេលនោះ ត្រូវកត់សំគាល់ថា នៅទីនោះគេមិនអាចដើរកន្លងសីល៥តំណាងឱ្យ "កុំលួច កុំសម្លាប់ កុំភរ កុំផឹកស្រា និងកុំលួចប្រពន្ធគេ" បានទេ ៕


**KhmerPost USA, LLC**
**East Coast Publication**

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Audria Chea, Sovan Heng**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
267-253-3947
**Sam Khoeun**
*Sales Consultant*
(781) 244-0522

*Design Staffs:*
**Leang Heng & Doch Vuthy**
~~~~~

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Pennsylvanian & Massachusett.
~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120
~~~
~~~

# “NATOឬ OTAN ? តម្លៃនៃសន្តិសុខនៅអឺរ៉ុប E.U

វិបត្តិដែលគេពុំហ៊ានឱ្យប្រឡាក់ទឹកមាត់ម្តងណាសោះក្នុងប្រវត្តិសាស្រ្ត ក្រៅពី De Gaulle កាលពីដើមកំណើតអង្គការ OTAN នេះ និងស្ស៊ីវែនណឺម៉ង់ (J.P.Chevenement ) កាលគាត់នៅជារដ្ឋមន្ត្រីការពារជាតិជំនាន់មីតទែរ៉ង់ (MITTERRAND ) ។ ឱ្យបានសមមុខ សមមាត់ ។ ហេតុអ្វីសហគមន៍អឺរ៉ុបនៅតែងាកមកសុំជំនួយសហរដ្ឋអាមេរិក តើគេចេះឬចង់បង្ហាញថា ខ្លួនគេអាចដឹកនាំបាន ឬអត់? ”

ប្រធានាធិបតី ក៏ពុំបានធ្វើអ្វីឱ្យ OTAN ខ្លាំងជាងកាលគាត់មិនទាន់ក្លាយជាសមាជិកដែរ ។ ផ្ទុយ







ថ្មីៗនេះគឺ រ៉ូប៊ែរហ្គេត (Robert Gates ) ក្រសួងការពារជាតិសហរដ្ឋអាមេរិក និយាយថា ”គឺជាឧបករណ៍បន្ថែមនៃអសមត្ថភាពរបស់ OTAN” នៅចំពោះមុខសត្រូវខ្លួន គឺហ្គាដាហ្វី ដែលបានរលំគ្រឿងទាំងសព្វាវុធ ទាំងមីស៊ីល OTAN ធ្វើអីពុំកើត ! ។

Robert Gate បន្ថែមថា: ”នេះគឺជារដ្ឋប្រហារដ៏ត្រចេះត្រចង់មួយ ក្នុងប្រវត្តិសាស្រ្ត ដែលគេចំណាយពេលអស់ជាង១១សប្តាហ៍ ដោយពុំបានអ្វីទៅវិញ Sarkosy ”ពុំបានជោគជ័យទៅវិញទេ ក្នុងនយោបាយបញ្ចុះបញ្ចូលសមាជិក OTAN ឱ្យនៅក្រៅសែវ៉ានឆ្ងាយពី ស.រ.អា!” ។

មានតែបារាំង ចក្រភពអង់គ្លេស-ក្រិច និងអាល់បានី ទេ ដែលមានថវិការលើកពី២% នៃ GDP សម្រាប់ចិញ្ចឹម OTAN ។ គឺ៤ប្រទេសតែប៉ុណ្ណោះលើ ២៧ដែលចំណាយថវិការជាតិរបស់គេសម្រាប់ចិញ្ចឹម Rayanline Brusselo (តនៅទំព័រទី ១៩)

# Happenings in Philadelphia

| Museums/Galleries | Exhibits/Theatre |
| --- | --- |
| **Philadelphia Museum of Art**<br>“Paris through the Window: Marc Chgall & His Circle,” through July 10; “Kobe: Japan’s Window on the World,” through Dec. 21, Benjamin Franklin Pkway. 215-763-8100. www.philamuseum.org | **Philadelphia Zoo**<br>“X-ink*shun,” through Oct. 31; Rock’n Roar Concert Series presents Ernie and Neil 10 a.m. June 14. Cost: Free-$18. 34th St. & Girard Ave. 215-243-5336. www.philadelphiazoo.org |
| **Please Touch Museum**<br>Children Museum<br>4231 Avenue of the Republic. 215-963-0667. www.pleasetouchmuseum.org | **Miss Saigon**<br>Through July 17. Tickets: $10-$95. Walnut St. Theatre, 825 Walnut St. 215-574-3550. www.walnutstreetheatre.org |
| **Khmer Art Gallery**<br>319 N. 11th Street. 215-922-5600<br>Private Showings by appointment. | **Asian Arts Initiative**<br>1219 Vine St.<br>215-557-0455<br>www.asianartinitative.org |

**Health**

The Department of Special Education at West Chester University is seeking parents of children with disabilities to act as host mentor families for 3- hours between months of June and August. The purpose of this course is for graduate students to experience and learn from parents of children with disabilities. If interested, or for more information, please contact Dr. Vicki McGinley at 610-436-1060 or vmcginley@wcupa.edu

តមកពីទំព័រទី ២០

## បេសកកម្មមនុស្សធម៌ដឹកម្ហូបចម្រាស...

គឺឆ្ពោះទៅកាន់វត្ត "ចូកគ្រួស" ដែលជាជំរំជនភៀសសឹកដ៏ធំជាងគេក្នុងចំណោះជំរំទាំង១១ នៅក្នុងស្រុកសំរោង ខេត្តឧត្តរមានជ័យ ព្រោះទីនោះមានជនភៀសសឹកដល់ទៅ១៨៩៥គ្រួសារ ។ នេះបើតាមរបាយការណ៍ក្រៅផ្លូវការពីមន្ត្រីអប់រំម្នាក់ឈ្មោះ "សុង" ដែលបានផ្ដល់ឱ្យយើង ហើយកាត់ក៏ជាសហការីដ៏សកម្មមួយរូបដែលចូលរួមក្នុងសក្ខាភាពមនុស្សធម៌ជាមួយនឹងក្រុមការងាររបស់យើង ។ ហើយតាមរយៈនៃមន្ត្រីអប់រំខេត្តដដែលនេះ លោកក៏ជាសារតាំងក្នុងការទំនាក់ទំនងជាមួយអាជ្ញាធរមូលដ្ឋានដើម្បីសុំការអនុញ្ញាត ដើម្បីឱ្យក្រុមការងារយើងបានចែកអំណោយដល់ជនភៀសសឹក ។ ដោយយល់ថា មានការនឿយហត់ច្រើន ទើបលោក សុង ត្រូវបានទទួលសគុណចំនួន ៥០ដុល្លារពីក្រុមការងារមនុស្សធម៌យើង ប៉ុន្តែលុយនេះជាថវិកាផ្ទាល់ខ្លួនរបស់លោក ស៊ូ អេងឡេង ប្រធានមូលនិធិ "ករុណាសង្គ្រោះ" ជាមូលនិធិដែលមានគោលដៅផ្សព្វផ្សាយ និងពង្រីកផ្នែកព្រះពុទ្ធសាសនានៅឯប្រទេសតៃវ៉ាន់ ។ ហើយក្នុងដំណើរបេសកកម្មមនុស្សធម៌រួមគ្នានេះ គឺមូលនិធិនេះហើយជាអ្នកចេញថ្លៃលើការហូបចុកទាំងអស់ ។

មិត្តអ្នកអានជាទីមេត្រី ដោយសារតែពេលវេលាខ្លី និងក៏មានការកំណត់ ដើម្បីចែកអំណោយជាស្រេចហើយនោះ ទើបរថយន្តទាំងពីរគ្រឿងរបស់ក្រុមការងារយើង បោះពួយសម្រុកទៅមុខយ៉ាងលឿនលើកំណត់ផ្លូវកៅស៊ូដ៏រាបស្មើមួយអន្លើ និងលើផ្លូវដីក្រហមមួយអន្លើ ដែលម្ដងម្កាលធ្វើឱ្យយើងពុំអាចចាក់ភ្នែកមើលទេសភាពដ៏ស្រស់ល្អត្រកាលនាពេលអរុណោទ័យបានឡើង ព្រោះដោយសារលំអងធូលីខ្មួលខ្មាញ់កើតចេញពីការខំបោះពួយទៅមុខរបស់ក្បួនរថយន្តយោធាជាច្រើនគ្រឿង ដែលដឹកសម្ភារៈសឹកឆ្ពោះទៅកាន់ខេត្តឧត្តរមានជ័យ ដូចក្រុមរបស់យើងដែរ ។ តែទោះបីជាយ៉ាងណាក៏ដោយ ទីបំផុតយើងបានទៅដល់គោលដៅដោយសុវត្ថិភាព និងតាមកាលកំណត់ ពោលគឺ ប្រមាណជាម៉ោង៨ព្រឹក ។





ទិដ្ឋភាពនៃជំរំជនភៀសសឹកក្នុងវត្ត "ចូកគ្រួស" នាពេលព្រឹកព្រលឹមមានសភាពអ៊ូអរ ។ នៅទីនោះយើងសង្កេតឃើញក្មេងចាស់ប្រុសស្រីគ្រប់វ័យមានសភាពស្គមស្គាំង ស្លេកស្លាំង ហាក់ខ្វះសារជាតិបំរុងអ្វីម្យ៉ាង ។ ក្រៅពីការជ្រកកោនក្រោមដំបូងប៉ាតង់ពណ៌បៃតងយ៉ាងរកេតរកូតហើយនោះ យើងក៏សង្កេតឃើញមានអ្នកកប់បន្លែ ត្រី សាច់ កំប៉ិកកំប៉ុកប្រមាណជា៥-៦នាក់ដែរ ដែលនេះជាផ្នែកមួយក្នុងការសម្រួលដល់តម្រូវការបណ្ដោះអាសន្នដល់ជនភៀសសឹកនៅទីនោះ ។ នៅពេលនោះអាជ្ញាធរមូលដ្ឋានមានការរាក់ទាក់ និងស្វាគមន៍ចំពោះក្រុមការងារយើងក្នុងនាមជាម្ចាស់អំណោយ និងអាជ្ញាធរដែនដី ប៉ុន្តែយើងមិនបានខ្វល់ មិនបានរាក់ទាក់ និងមិនគួរសមជាមួយអាជ្ញាធរទាំងនោះឡើយ ដោយទុកឱកាសផ្ដល់ឱ្យចាស់ៗគាត់រាក់ទាក់ សំណេះសំណាលគ្នាចុះ ព្រោះយើងមានកិច្ចការរបស់យើង គឺប្រញាប់ដើរសំដៅចូលក្នុងជំរំ ដើម្បីផ្ដិតយករូបភាព និងជាប់សម្ភាសន៍ជាមួយជនភៀសសឹក ។ មិត្តអ្នកអានជាទីគោរព ក្នុងនាមជាអ្នកកាសែតផង និងតំណាងពលរដ្ឋម្ចាស់អំណោយក្នុងសហគមន៍ខ្មែរហ្វីឡាដែលហ្វៀផង គឺពិតជាមានការនឿយហត់ក្នុងកិច្ចការខ្លាំងណាស់ តែយើងគ្មានទេ ពាក្យថារុញរ៉ា ហើយផ្ទុយទៅវិញគឺពេញចិត្តពេញថ្លើមចំពោះកិច្ចការមនុស្សធម៌បែបនេះណាស់ ។

បន្ទាប់ពីចំណាយវេលាជិតមួយម៉ោងក្នុងជំរំ ទើបយើងត្រឡប់មកកាន់ក្រុមការងារ និងអាជ្ញាធរមូលដ្ឋានដែលកំពុងនិយាយគ្នាពីរឿងកិច្ចការអ្វីម្យ៉ាងដែលយើងមិនបានដឹង នៅជិតខ្លោងទ្វារចូលវត្ត ។ ពេលមកដល់យើងមានការខកចិត្តបន្តិចដែរ ព្រោះលោក ស៊ូ អេងឡេង បានប្រាប់យើងថា "គេមិនទាន់ឱ្យពួកយើងចែកអំណោយឥឡូវនេះទេ ព្រោះមានខាងកាកបាទក្រហមខ្មែរ កំពុងបំពេញសកម្មភាពនៅដំណាលគ្នានេះដែរ តែគេថាចាំដល់ថ្ងៃបន្តិចប្រមាណជាម៉ោង១១ ឬ១២ថ្ងៃត្រង់ ទើបបានគេឱ្យពួកយើងចែក..." ។

ដោយការចង់បំពេញនូវកតព្វកិច្ចមនុស្សធម៌ឱ្យបានចប់ចុងចប់ដើម ដើម្បីយើងគ្មានប្រតិកម្ម ឬទោមនស្សចំពោះបទបញ្ជារបស់អាជ្ញាធរ និងពីសំណាក់សមត្ថកិច្ចឡើយ ហើយយើងក៏បានធ្វើដំណើរទៅទីរួមខេត្តតាមរយៈការធ្វើអន្តរាគមន៍ និងជូនដំណើរដោយលោក សុង ដើម្បីឆ្ពោះទៅកាន់ទីជម្រករបស់ជនភៀសសឹកដទៃៗជាច្រើនក្រុមផ្សេងទៀត ដែលបានបោះតង់នៅតាមទីវត្តអារាមនានា និងនៅតាមបរិវេណនៃសាលាបឋមសិក្សាជាច្រើនកន្លែងដែលយើងពុំអាចចាំអស់ ។ ដូចការអះអាងរបស់លោក សុង មែននៅទីនោះ យើងឃើញនូវទិដ្ឋភាពដ៏សង្វេកនៃជនភៀសសឹក ពួកគាត់សំដៅចោមរោមក្រុមការងារយើង ពួក្យគាត់អង្វរយ៉ាងទទូចមករកយើងថា "លោកគ្រូសុំអង្ករមួយការុងមក ខ្ញុំដាច់ពេលហើយ..." ហើយពាក្យអង្វរបែបនេះ ត្រូវបានបន្លឺស្ទើរគ្រប់ៗគ្នា ក្នុងខណៈដែលយើងកំពុងជាប់រវល់ជាមួយនឹងម៉ាស៊ីនថត ដើម្បីសម្រិតសម្រាំងផ្ដិតយករូបភាពដ៏កម្រនៅទីនោះ ។

ទាក់ទងនឹងការអង្វរកររបស់ជនភៀសសឹកនៅទីនោះ យើងបានដាក់ជាសំណួរដល់ពួកគាត់ថា "តើធ្លាប់មានអង្គការ ឬក្រុមណាធ្លាប់បានចុះមកជួយផ្ដល់ស្បៀងដល់បងប្អូនដែរឬទេ ?" ។ ភ្លាមនោះពួកគាត់ឆ្លើយម្ដងម្នាក់ ដោយមុខមាត់ស្រពោបស្រពោនថា "មិនធ្លាប់មានខាងណាមកជួយឡើយ តែខាងកាក-បាទក្រហមធ្លាប់ចុះមកម្ដងម្កាលដែរ តែពុំមានចែកអំណោយអ្វីឡើយ គឺគ្រាន់តែយកកាត (Card) ក្នុងគ្រួសារមួយសន្លឹក សម្រាប់ចាំចែកអំណោយ តែរហូតមកដល់ឥឡូវ កាត់នោះយើងកាន់ស្ទើរតែរលួយអស់ទៅហើយ គឺនៅពុំទាន់មានគេមកចែកឱ្យទៀត..." ។

ជាការពិតយើងទទួលស្គាល់ និងសារភាពដោយត្រង់ថា យើងមានការរារែក និងអល់អែកយ៉ាងខ្លាំងចំពោះការទទួចអង្វរពីសំណាក់បងប្អូនជនភៀសសឹក នៅទីនោះ ព្រោះ "របស់តិច, មនុស្សច្រើន" ដូច្នេះយើងក៏សម្រេចឱ្យតំណាងម្នាក់ជាអ្នកជ្រើសរើសរកគ្រួសារណាដែលក្រខ្សត់ខ្លាំងជាងគេ ទើបយើងជូនស្បៀងដល់ពួកគាត់ តាមរយៈតំណាងម្នាក់ដែលជាអ្នកចែកផ្ទាល់ ហើយយើងប្រញាប់បន្តដំណើរទៅកាន់កន្លែងផ្សេងទៀត តាមការណែនាំរបស់លោក សុង ដែលជាម្ចាស់ស្រុកនៃទឹកដីជាប់ភ្នំផងរែកមួយនេះ ។ មិនបង្អែរបង្អង់យូរ យើងក៏ប្រញាប់បត់រថយន្តទៅកាន់វត្ត "ចូកគ្រួស" ព្រោះជិតដល់ម៉ោងកំណត់ហើយ ហើយយើងស្រេកឃ្លានក្នុងការចែកទាន យើងចង់ឃើញជនភៀសសឹកទទួលអំណោយដោយផ្ទាល់ភ្នែក និងចង់ចែកដោយផ្ទាល់ដៃ ប៉ុន្តែពេលទៅដល់វត្ត "ចូកគ្រួស" តាមការកំណត់នោះ ត្រូវបានអាជ្ញាធរមូលដ្ឋានលេបសំដីជាលើកទី២ម្ដងទៀត ដែលជាហេតុធ្វើឱ្យក្រុមការងារមនុស្សធម៌យើងមានការខកចិត្ត សោកស្ដាយលាយឡំនិងការខឹងសម្បារយ៉ាងខ្លាំង ។

ប្រិយមិត្តជាទីគោរពរាប់អាន ចំពោះអ្វីដែលយើងនឹកស្មានមិនដល់ យល់មិនជ្រៅនោះ គឺទង្វើរបស់អាជ្ញាធរមូលដ្ឋាន ដែលបានរារាំងមិនឱ្យក្រុមការងារយើងចែកអំណោយឡើយ ក្នុងខណៈពេលដែលជនភៀសសឹកជាច្រើនពាន់គ្រួសារកំពុងតែចាំទទួលអំណោយដោយតក់ក្រហល់នោះ ទង្វើរដ៏ចំណែកខុសពីប្រក្រតីបែបនេះ ត្រូវបានទទួលរងនូវការស្ដីបន្ទោសយ៉ាងខ្លាំងពីសំណាក់ប្រជាពលរដ្ឋដែលជាជនភៀសសឹក ។

ដោយការមិនអស់ចិត្តយើង បានសុំសម្ភាសន៍ជាចៅសង្កាត់ម្នាក់ ដែលអះអាងថា ជាអ្នកមើលការខុសត្រូវ និងទទួលបន្ទុកលើជនភៀសសឹកទាំងឡាយក្នុង "វត្តចូកគ្រួស" អំពីមូលហេតុនៃការបដិសេធមិនព្រមទទួលយកអំណោយពីសប្បុរសជន ។ ចំពោះចម្លើយដ៏មិនសមហេតុផលរបស់ចៅសង្កាត់ ដែលឆ្លើយយករួចខ្លួន បានធ្វើឱ្យយើងចង់ខឹងបន្តិច ចង់សើចព្រោះហួសចិត្តបន្តិច ព្រោះគាត់បានអះអាងថា "នេះជាបញ្ហាចេញពីថ្នាក់លើ" ។ មែនទែនទៅតាមការប៉ាន់ស្មានរបស់យើងនេះប្រហែលជាបទបញ្ជាដាច់ខាតចេញពីថ្នាក់លើពិតប្រាកដហើយមើលទៅ !។ រីឯលោកចៅសង្កាត់រូបនោះ ក៏ពិបាកនឹងចំពោះសំណួររបស់យើងណាស់ដែរ លោកបានថ្លែងនៅចំពោះមុខជនភៀសសឹកក្នុងខណៈដែលយើងកំពុងតម្រង់ម៉ាស៊ីនថតវីដេអូ (Mamera Recorder) ទៅរកគាត់យ៉ាងដូច្នេះថា "ខ្ញុំក៏សោកស្ដាយខ្លាំងណាស់ដែរ តែធ្វើម៉េចនេះជាបញ្ហា ហើយខ្ញុំយល់ណាស់ថាបងប្អូនចង់បានអំណោយពីអស់លោកយ៉ាងប្រាកដ ហើយខាងអស់លោកក៏ចង់ចែកអំណោយដល់បងប្អូនយើងនេះទៅនេះដែរ..." ។

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំពូកប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១០ ខែមិថុនា ឆ្នាំ២០១១

# New Commune Elections Stir Old Controversy

BY KUCH NAREN
THE CAMBODIA DAILY

SRP council members in Banteay Meanchey's Poipet commune submitted a complaint on Tuesday asking the commune chief to delay the election of 23 new village chiefs scheduled for next week, citing unresolved disputes over the last election five years ago.

During the 2006 elections, in which commune councilors voted for village chiefs nationwide, the SRP won five village chief positions in Poipet commune, the ruling CPP won four, and the Norodom Ranariddh Party won the remaining two. But the results of that election were rejected by provincial authorities, and the elected chiefs never took up their positions.

Now elections are scheduled for Monday to choose new chiefs for those 11 villages, plus another 12 villages that were established recently. But SRP councilors say the results of the last election should be settled first, especially as the local political landscape has changed to their disadvantage since 2006.

"The previous matter has not yet been resolved, but the commune chief recently created more villages, and now they are organizing an election for more village chiefs," said Mean Sarith, an SRP councilor for Poipet City who oversees party activity in Poipet commune.

He claimed the 2006 results were rejected because the SRP prevailed.

But Poipet commune chief San Seanhor, a CPP member, said the new election couldn't be delayed.

"There were irregularities in the [previous] election, which is why the result was rejected," Mr Seanhor said.

To be elected, a candidate must first be formally nominated by the commune chief or deputy commune chief, then must get at least six votes from the 11 members of the commune council. Mr Seanhor said that 69 candidates had been nominated so far. None are from the SRP.

The SRP complains that it has become impossible for them to get a candidate nominated after deputy commune chief Khat Thea, a former member of the SRP, defected to the CPP in 2009. The SRP has struggled to get another SRP member appointed to the position, saying that otherwise the new elections will be unfair.

"Because the official SRP replacement has not yet been approved, the SRP are unable to name a candidate for the election," Mr Sarith said.

Mr Seanhor said Mr Thea would not be replaced, calling the issue "the internal affairs of the Sam Rainsy Party."

# ការបោះឆ្នោតឃុំ_សង្កាត់ថ្មីបង្កឱ្យមានភាពចម្រូងចម្រាស

ដោយ : គុច ណារ៉េន
THE CAMBODIA DAILY



សមាជិកក្រុមប្រឹក្សាគណបក្ស សម រង្ស៊ី ក្នុងសង្កាត់ប៉ោយប៉ែត ខេត្តបន្ទាយមានជ័យ បានដាក់ពាក្យបណ្តឹងមួយកាលពីថ្ងៃអង្គារ ដោយស្នើសុំឱ្យមេឃុំពន្យាពេលបោះឆ្នោតជ្រើសរើសមេភូមិថ្មីចំនួន ២៣រូប ដែលគ្រោងនឹងធ្វើឡើងនៅសប្តាហ៍ក្រោយនេះ ដោយលើកឡើងពីទិវា ដែលមិនទាន់បានដោះស្រាយរួចជុំវិញការបោះឆ្នោតកាលពី៥ឆ្នាំមុន ។

អំឡុងការបោះឆ្នោតឆ្នាំ២០០៦ ដែលពេលនោះ ក្រុមប្រឹក្សាឃុំ-សង្កាត់ បានបោះឆ្នោតជ្រើសរើសប្រធានភូមិទូទាំងប្រទេស នោះគណបក្ស សម រង្ស៊ី បានទទួលតំណែងប្រធានរូបចំនួន៥ នៅក្នុងសង្កាត់ប៉ោយប៉ែត គណបក្សប្រជាជនកម្ពុជា ដែលកាន់អំណាចទទួលបាន៤ ហើយគណបក្សនរោត្តម រណប្ញទ្ធិ ទទួលបាន២ ។ ប៉ុន្តែលទ្ធផលនៃការបោះឆ្នោតនោះ ត្រូវបានច្រានចោលដោយអាជ្ញាធរខេត្ត ហើយប្រធានភូមិដែលជាប់ឆ្នោតនោះ មិនដែលបានកាន់តួនាទីរបស់ខ្លួនឡើយ ។

ពេលនោះការបោះឆ្នោតគ្រោងនឹងធ្វើឡើងនៅថ្ងៃច័ន្ទនេះ ដើម្បីជ្រើសរើសប្រធានភូមិថ្មីសម្រាប់ភូមិមចំនួន១១នោះ រួមទាំងភូមិចំនួន១២ផ្សេងទៀត ដែលត្រូវបានបង្កើតឡើងនាពេលថ្មីៗនេះ។ ប៉ុន្តែក្រុមប្រឹក្សាគណបក្ស សម រង្ស៊ី និយាយថា លទ្ធផលនៃការបោះឆ្នោតលើកមុនគួរតែត្រូវបានដោះស្រាយជាមុនសិន ជាពិសេសដោយសារតែទិដ្ឋភាពនយោបាយបានប្រែជាគុណវិបត្តិសម្រាប់ខ្លួនចាប់តាំងពីឆ្នាំ២០០៦មក ។

លោក មៀន សារិទ្ធ ក្រុមប្រឹក្សាគណបក្ស សម រង្ស៊ី ប្រចាំនៅក្រុងប៉ោយប៉ែត ដែលមើលខុសត្រូវគណបក្ស សម រង្ស៊ី នៅក្នុងសង្កាត់ប៉ោយប៉ែត បានថ្លែងថា "បញ្ហាលើកមុនមិនទាន់ត្រូវបានដោះស្រាយនៅឡើយទេ ប៉ុន្តែមេឃុំថ្មីនេះ បែរជាបានបង្កើតភូមិបន្ថែមទៀត ហើយពេលនេះកំពុងរៀបចំការបោះឆ្នោតដើម្បីជ្រើសរើសប្រធានភូមិបន្ថែមទៀតទៅវិញ" ។

លោកបានអះអាងថា លទ្ធផលឆ្នាំ២០០៦ ត្រូវបានច្រានចោលពីព្រោះគណបក្ស សម រង្ស៊ី បានឈ្នះ ។

ប៉ុន្តែលោក សាន ស៊ានហោ ចៅសង្កាត់ប៉ោយប៉ែត និងជាសមាជិកគណបក្សប្រជាជនកម្ពុជា បានមានប្រសាសន៍ថា ការបោះឆ្នោតថ្មីនេះមិនអាចពន្យាពេលបានឡើយ ។

លោក សាន ស៊ានហោ បានមានប្រសាសន៍ថា "មានភាពមិនប្រក្រតីនៅក្នុងការបោះឆ្នោត (លើកមុន) ជាហេតុធ្វើឱ្យលទ្ធផលត្រូវបានច្រានចោល" ។

ដើម្បីជាប់ឆ្នោត បេក្ខជនជាដំបូងត្រូវទទួលបានការជ្រើសរើសតាំងផ្លូវការដោយចៅសង្កាត់ ឬជំទប់បន្ទាប់មកត្រូវទទួលបានសន្លឹកឆ្នោតយ៉ាងតិច៦សំឡេងពីសមាជិក១១រូបនៃក្រុមប្រឹក្សាសង្កាត់ ។ លោក ស៊ានហោ បានមានប្រសាសន៍ថា បេក្ខជនចំនួន៦៩រូបត្រូវបានជ្រើសតាំងរហូតមកទល់ពេលនេះ ។ គ្មានបេក្ខជនមកពីគណបក្ស សម រង្ស៊ី ទេ ។

គណបក្ស សម រង្ស៊ី តវ៉ាថា ខ្លួនពុំអាចជ្រើស តាំងបេក្ខជនណាម្នាក់បានទេ ក្រោយពេលលោកជំទប់ ខាត់ ធា ជាសមាជិកគណបក្ស សម រង្ស៊ី បានចុះចូលជាមួយគណបក្ស សម រង្ស៊ី ក្នុងឆ្នាំ២០០៩ ។ គណបក្ស សម រង្ស៊ី បានតស៊ូដើម្បីទទួលបានការតែងតាំងសមាជិកគណបក្ស សម រង្ស៊ី ម្នាក់ទៀតសម្រាប់តួនាទីនេះដោយនិយាយនេះ បើអីចឹងទេការបោះឆ្នោតថ្មីនេះនឹងមិនយុត្តិធម៌ ទេ ។

លោក សារិទ្ធ បានមានប្រសាសន៍ថា "ដោយសារការដាក់អ្នកជំនួសរបស់គណបក្ស សម រង្ស៊ី ជាផ្លូវការបានអនុម័តនៅឡើយនោះ គណបក្ស សម រង្ស៊ី មិនអាចជ្រើសតាំងបេក្ខជនណាម្នាក់សម្រាប់ការបោះឆ្នោតទេ" ។

លោក ស៊ានហោ បានថ្លែងថា លោក ខាត់ ធា នឹងមិនត្រូវបានដាក់ជំនួសទេ ដោយហៅបង្ហាញនេះថាជា "កិច្ចការផ្ទៃក្នុងរបស់គណបក្ស សម រង្ស៊ី" ៕

## Rights Group Calls for Release of Suos Chantha

Following his November arrest on drug-trafficking charges, labor organizer Suos Chantha is to stand trial today at Phnom Penh Municipal Court. Led by Amnesty International, a group of six human rights and labor organizations yesterday called for his "unconditional release," saying his prosecution appeared to be "in retaliation for his union activities in advocating for labor rights." Mr Chantha's arrest occurred as he was on the verge of leading the mass defection of 1,000 workers from a CPP-affiliated union to the Coalition of Cambodian Apparel Workers' Democratic Union. He faces five years in prison if convicted. In a letter to Interior Minister Sar Kheng and Sok An, minister in charge of the Council of Ministers, the organizations cited a lack of credible evidence and called on the government to protect the rights of trade unionists generally.
*(Hul Reaksmey)*

## Amnesty អំពាវនាវឱ្យដោះលែង លោក សួស ចន្ថា

ដោយ : ហ៊ុល រស្មី
THE CAMBODIA DAILY

បន្ទាប់ពីការចាប់ខ្លួនលោកកាលពីខែវិច្ឆិកាតាមការចោទប្រកាន់ពីបទជួញដូរគ្រឿងញៀនមកលោក សួស ចន្ថា ដែលជាអ្នករៀបចំការងារនឹងត្រូវកាត់ក្តីនៅថ្ងៃនេះ នៅសាលាដំបូងរាជធានីភ្នំពេញ ។ ដឹកនាំដោយអង្គការសិទ្ធិមនុស្ស Amnesty International អង្គការសិទ្ធមនុស្ស និងអង្គការពលកម្មមួយក្រុមចំនួន៦ កាលពីម្សិលមិញបានអំពាវនាវនាំឱ្យមាន "ការដោះលែងលោកដោយឥតលក្ខខណ្ឌ" ដោយលើកឡើងថាការដាក់ទោសលោកហាក់ដូចជា "សិតក្នុងការតំកូនចំពោះសកម្មភាពសហជីពរបស់លោកក្នុងការគាំទ្រសិទ្ធិការងារ"។ ការចាប់ខ្លួនលោក ចន្ថា បានកើតឡើងខណៈដែលលោហៀបនឹងដឹកនាំការចាក់ចេញរបស់កម្មករចំនួន១.០០០នាក់ពីសហជីពដែលមានសម្ព័ន្ធភាពជាមួយគណបក្សប្រជាជនកម្ពុជា ទៅចូលរួមជាមួយក្រុមចម្រុះនៃសម្ព័ន្ធសហជីពប្រជា-ធិបតេយ្យកម្មកររោងចក្រកម្ពុជា ។ លោកប្រឈមនឹងការជាប់ពន្ធនាគាររយៈពេល៥ឆ្នាំ ប្រសិនបើត្រូវបានកាត់ទោស ។ នៅក្នុងលិខិតមួយច្បាប់ជូនលោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងលោក សុខ អាន រដ្ឋមន្ត្រីទទួលបន្ទុកទីស្តីការគណៈរដ្ឋមន្ត្រីអង្គការទាំងនេះ បានលើកឡើងពីកង្វះភស្តុតាងគួរឱ្យទុកចិត្តបាន ហើយបានអំពាវនាវដល់ដល់រដ្ឋាភិបាលឱ្យជួយការពារសិទ្ធិក្រុមសហជីពកម្មករជាទូទៅ ៕

## ឡាវប្រាប់ក្រុមហ៊ុនអភិវឌ្ឍន៍ថៃថាទំនប់សាយ៉ាប៊ូរីអាចសាងសង់បាន

ដោយ : PAUL VRIEZE
THE CAMBODIA DAILY

អង្គការបរិស្ថានមួយបាននិយាយកាលពីម្សិល-មិញថា ឯកសារបែកធ្លាយមួយបង្ហាញថា ប្រទេសឡាវមានបំណងបន្តការអភិវឌ្ឍទំនប់សាយ៉ាប៊ូរី ដ៏ចម្រូងចម្រាសនៅលើទន្លេមេគង្គ ថ្វីបើបានសន្យាចំពោះបណ្តាប្រទេសផ្សេងទៀតដែលជាសមាជិករបស់គណៈកម្មការទន្លេមេគង្គថា ខ្លួននឹងធ្វើការវាយតម្លៃជាថ្មីអំពីផលដែលប៉ះពាល់របស់ទំនប់នេះក្តី ។ អង្គការ International Rivers បាននិយាយថា ខ្លួនទទួលបានលិខិតមួយចុះកាលបរិច្ឆេទថ្ងៃទី៨ មិថុនា ពីក្រសួងថាមពលឡាវផ្ញើទៅក្រុមហ៊ុន Ch Karnchang ដែលជាក្រុមហ៊ុនអភិវឌ្ឍន៍គម្រោងរបស់ថៃ ដោយជូនដំណឹងដល់ក្រុមហ៊ុននេះថា លក្ខខណ្ឌទាំងអស់នៃដំណើរការធ្វើសេចក្តីសម្រេចរួមរបស់គណៈកម្មការទន្លេមេគង្គស្តីពីទំនប់នេះ ត្រូវបានបំពេញរួច ហើយក្រោយពីការសិក្សាមួយដែលមានរយៈពេលមួយខែស្តីពីគម្រោងនេះ ត្រូវបានបញ្ចប់នេះពេលថ្មីៗនេះ ។ អាម៉េ ត្រានដេម ដែលជាមន្ត្រីសម្របសម្រួលទទួលបន្ទុកទន្លេមេគង្គនៅអង្គការនេះបានមានប្រសាសន៍ថា ការអះអាងរដ្ឋាភិបាលដែលថាទំនប់វ៉ារីអគ្គិសនីកម្លាំង១.២៦០មេហ្គាវ៉ាត់នេះ នៅពេលនេះអាចបន្តបាននោះ "គឺជាការរំលោភលើសេចក្តីទុកចិត្តយ៉ាងជាក់ស្តែង" ពីព្រោះដំណើរការរបស់គណៈកម្មការទន្លេមេគង្គបានតម្រូវឱ្យសមាជិកទាំងអស់ព្រមព្រៀងលើការអភិវឌ្ឍណាមួយលើទន្លេមេគង្គ ។ កាលពីខែមេសា ប្រទេសវៀតណាម ឡាវ កម្ពុជា និងថៃ ដែលជាសមាជិករបស់គណៈកម្មការទន្លេមេគង្គ មិនបានព្រមព្រៀងលើទំនប់សាយ៉ាប៊ូរី នេះទេ ហើយបានពន្យារពេលធ្វើសេចក្តីសម្រេចរហូតដល់ខែវិច្ឆិកា។ លោក តែ ណាវុធ ជាប្រធានគណៈកម្មាធិការជាតិទន្លេមេគង្គកម្ពុជា បានមានប្រសាសន៍ថា ប្រទេសឡាវកំពុងបញ្ជូន "សារដែលនាំឱ្យមានការភាន់ច្រឡំ" អំពីឆន្ទៈរបស់ខ្លួនក្នុងការធ្វើសហប្រតិបត្តិការជាមួយសមាជិកផ្សេងៗទៀតរបស់គណៈកម្មការទន្លេមេគង្គ ។ លោកបានមានប្រសាសន៍ថា ឡាវបានសន្យាកាលពីខែមេសា ថានឹងធ្វើការសិក្សាពីផលប៉ះពាល់ផ្នែកបរិស្ថានស្តីពីទំនប់នេះ ៕

តមកទំព័រទី ០១

# 2011 Independence Day....

*ថ្ងៃ០៤ កក្កដា មានព្រឹត្តិការណ៍អ្វីខ្លះ នៅហ្វីឡាដែលហ្វីញ៉ា ។*

•••សាខាសមាគមអតីតយុទ្ធជន ខ្មែរនៅហ្វីឡា-ដែលហ្វៀដែលមានមូលដ្ឋាននៅឡូងប៊ិចដឹកនាំដោយ លោក សរិត ប៉ែន និងរៀបចំពិធីជប់លៀងជាមួយ សមាជិករបស់លោកនៅរាត្រីថ្ងៃសៅរ៍ ទី០២ ខែកក្កដា នៅភោជនីយដ្ឋាន"ត្លោឡិន បាឡេស" ស្ថិតនៅផ្លូវវ៉ាស៊ីនតុន ដើម្បីជាកិត្តិយសដល់ថ្ងៃបុណ្យឯករាជ្យអាមេរិកាំងនេះ ។

ពិធីជប់លៀងនេះជាការជួបជុំគ្នាដើម្បីត្រៀមចូលរួមក្នុងសកម្មភាពមួយទៀត គឺជាការដង្ហែរក្បួនព្យុហយាត្រានៅតាមដងផ្លូវ "Rising Sun" ជាមួយអតីតយោធាអាមេរិកាំង នាថ្ងៃទី០៤ ខែកក្កដា វេលាម៉ោង៩ព្រឹកនៃតំបន់ Lawncrest ។ អតីតយោធាខ្មែរ និងប្រដាប់អាវុធដោយសម្លៀកបំពាក់ជាយោធា និងបង្ហាញខ្លួននៅចំពោះមុខសាធារណជនចម្រុះសាសន៍ ដើម្បីអបអរសាទរបុណ្យឯករាជ្យអាមេរិកាំង ៕

# ពិភពវីដេអូខ្មែរ
# Khmer World Videos







301 Reservoirs Blvd. Cranston, RI 02907

**KIM (401) 808-9336**




# ភោជនីយដ្ឋាន ឆាយណាស្តារ
## China Star

មានម្ហូបចិន
ម្ហូបប៉ូលីណេស៊ី
ម្ហូបចិនកាំតុង
ម្ហូបម៉ាំងដារិន

Chinese -Polynesian -Cantonese -Mandarin
369 Broadway St., Lowell, MA 01854
Tel: 978-454-7578, 978-454-7507

Open Daily: Sun. to Thurs. 11:00 AM to 1:00 AM
Fri. and Sat. 11:00 AM to 3:00 AM



យើងអាចយកម្ហូបទៅដល់ផ្ទះបាន

We Deliver All Day: 11:30 AM to 1:00 AM Available to most areas. Min. $10.00 Delivery Charge $2

**$17.99**

បង្កងឆាខ្ទឹម និងខ្ញីពិសេស

SPECIAL 2 Lobsters w/ Scallion & Ginger

# NEW CHINA PEARL

## DIM SUM (All Day, EveryDay)

288 Mishawum Rd., Woburn, MA 01801
Phone:(781) 932-0031/Fax: (781) 932-0346
www.NewChinaPearl.com
From Boston 95 South; Exit 37B, from Lowell 93 South; Exist 37B, from RT-128; Exit 36.



ភោជនីយដ្ឋានញូឆាយណាភើលសូមអញ្ជើញលោកអ្នក និងក្រុមគ្រួសារមករីករាយជាមួយម្ហូបអាហារមកពីហុងកុង និងប្រទេសអាស៊ីនានាជុំវិញ ។ យើងមានសាលកំសាន្តសំរាប់ ពិធីការ ឬរាត្រីជួបជុំគ្នាមានបា និងខារ៉ាអូខេទៀតផង កន្លែងចតឡានមិនយកថ្លៃ ហើយមានសុវត្ថិភាពល្អ ។



新龍鳳大酒樓

**$13.99** Per/person

Sunday Night Buffet

Restaurant & Bar
ភោជនីយដ្ឋាន និងបា



ភោជនីយដ្ឋាន ញូ ឆាយណា ភើល

ការ៉ាអូគី Karaoke
Thursday – Saturday Night
8 p.m. – 11:45 p.m.

Ballrooms for Wedding & Party
មានឆាករាំសំរាប់ពិធីការ ឬប្រជុំកំសាន្ត

មានឌិនស៊ុមរាល់ថ្ងៃ DAILY DIM SUM
Weekdays: 11 a.m.–3 p.m.
Weekends: 10 a.m.-3 p.m.

**BUSINESS HOURS: Mon - Wed 11 a.m. - 10 a.m./Thurs. & Fri. 11 a.m. - 12 Midnight / Sat. 10 a.m. - 12 Midnight / Sun. 10 a.m. - 10 p.m. Delivery Hours 11 a.m. - 9 p.m. min. $15 order plus $2 delivery.**

## Congresswonan Niki Tsongas, Mass 5th District, Visited Cambodian Mutual Assistance Association of Greater Lowell



(Left to Right) : 1. Kevin Coughlin, CMAA Board member, 2. Lianne Linlavong, CMAA Board member, 3. Niki Tsongas, Congresswoman, 4. Vanna Howard, Niki's staff, 5. Rasy An, CMAA ED.



A group picture with staff and Cambodian elders who actively involve with CMAA's activities.

●●●សេចក្តីប្រកាសមួយនិយាយថា លោកស្រីព្រឹទ្ធសមាជិក ទីគី សុងហ្គា រដ្ឋម៉ាសាឈូសែត ប្រចាំសង្កាត់លេខ៥ និងមកធ្វើទស្សនកិច្ចនៅសមាគមខ្មែរ នាទីក្រុងឡូវែល ថ្ងៃទី២៨ ខែមិថុនា ដើម្បីជាកិច្ចប្រាស្រ័យទាក់ទងស្វែងយល់ឱ្យបានប្រសើរអំពីសហគមន៍ខ្មែរ ដែលមានចំនួនប្រមាណ៥ម៉ឺននាក់រស់នៅ ។ ថ្វីត្បិតប្រជាពលរដ្ឋដើមកំណើតខ្មែរមានកំណើនកាន់តែច្រើនបញ្ហាគ្រប់គ្រងកាន់តែច្រើន តែសមាគមខ្មែរដែលជាតំណាងតែមួយនៃសហគមន៍ដ៏ធំបែរជាទទួលថវិកាកាន់តែតិច បើប្រៀបធៀបទៅសម័យមុនវិបត្តិសេដ្ឋកិច្ច ហើយរឹតតែស្ទួចទៅទៀតនាបច្ចុប្បន្ន ។ ទស្សនកិច្ចលោកស្រី នីគី សុងហ្គា អាចនឹងនាំការវិវឌ្ឍន៍ថ្មីជាជំនួយដល់សហគមន៍ជាមិនខាន ។

(តទៅទំព័រទី ១៨)

## ប្រទេសយេម៉ែន :"សង្ឃឹម_តែដោយលបៗ!!"

### "ថ្ងៃដ៏មហានក្ខត្តឫក្សរបស់ប្រជាជនយេម៉ែន "



**សម្របសម្រួលដោយៈ គីម វិបល**

តើអ្នកណាទៅន់-ដែលអាចជឿបានថា ប្រជាជនយេម៉ែនអាចបណ្តេញជនផ្តាច់ការរបស់ជាតិខ្លួន-ឱ្យដើរចេញពីប្រទេសបានចុះ? នេះគឺជាសំដីរបស់គ្រូបង្រៀនម្នាក់មានអាយុ៣០ឆ្នាំ ។ គាត់ឈ្មោះថា មូហ៊ិត អាល់មុយតារីរ ។ នៅពេញមួយថ្ងៃក្រុមបាតុករបណ្តេញ សាឡីក (SALES) នៃរបបចាស់ក្នុងប្រទេស-ដោយជោគជ័យ ។

ក៏ប៉ុន្តែចំពោះ MC-KHALED,អាយុប្រមាណ១៧ឆ្នាំដែលជាក្មេងជំទង់ម្នាក់ល្បីល្បាញផ្នែករបាំ RAPP ក្នុងប្រទេសនោះ-គេបាននិយាយថា បដិវត្តន៍របស់យើងនៅពុំទាន់ចប់ទេ ។

យើងពុំចង់សម្លាប់ប្រធានាធិបតី SALES ទេ ។ ពួកយើងជាបាតុករពេញទៅដោយអហិង្សា-សន្តិភាពក្នុងស្មារតី ។ យើងចង់បានត្រឹមតែគាត់ចុះចេញពីអំណាចខ្មៅងងឹតរបស់គាត់តែប៉ុណ្ណោះ ។ ហើយក៏ជាកំហុសប្រវត្តិសាស្ត្រធំធេងណាស់បើគេសម្លាប់គាត់នោះ ។ ពួកយើងពុំត្រូវយកស្មារតីខ្មៅងងឹតដូចគាត់យកមកដាក់ក្នុងខ្លួនយើងម្នាក់ៗទេ យើងកុំឱ្យមានហិង្សាតទៅទៀត ។ គាត់ក៏ធ្លាប់ធ្វើល្អសម្រាប់ប្រទេសយើងដែរ ។ កំហុសគាត់-ត្រង់ថា គាត់ទុកច្រកឱ្យកូនចៅសាបព្រោះពុករលួយគ្រប់បែបគ្រប់កន្លែង ។ គឺនៅពេលនេះទេ ដែលបដិវត្តន៍មែនទែនកំពុងចាប់ផ្តើមកកើតសម្រាប់បញ្ហាក្មេងជំនាន់ក្រោយ ។ យើងមិនត្រូវដើរចេញពីទីលាននៅពេលនេះទេ ត្រូវនៅបន្តទៅទៀតបំពេញបដិវត្តន៍ឱ្យបានល្អ ។ នាំគ្នារង់ចាំរហូតបានអ្វីៗសព្វគ្រប់ដូចជាបុគ្គលសេរីពិតប្រាកដ ។

រីឯអាម៉ា រីមែកហ្វា (Amar Merfa) អាយុ២៣ឆ្នាំដែលមកពីភាគខាងជើងយេម៉ែនចូលរួមកំដរបាតុករបដិវត្តន៍ឯទៀត-គេនិយាយថា"សាឡីក ជាមនុស្សដែលយើងស្មានមិនត្រូវទេ"។ គាត់អាចកំពុងរកល្បិចមកសងសឹក-គាត់ជាមនុស្សប្រើល្បិចច្រើន ។

...ពួកយើងមានគំនិតគម្រោងវិធានការគ្រប់គ្រង... (តទៅទំព័រទី ១៩)

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១០ ខែមិថុនា ឆ្នាំ២០១១

# B Kak to Have Cambodia's Biggest Mosque

*Construction of $1 million building set to begin in August*

By Kate Bartlett and Chhorn Chansy
THE CAMBODIA DAILY

Construction on what will be Cambodia's largest mosque is set to begin in August. The new $1 million building will replace the current one at Phnom Penh's Boeng Kak lake, which has fallen into disrepair and is due to be demolished, officials said yesterday.

The funding is being provided by Sheik Eisa bin Nasser bin Abdullatif Al Serkal, an Emirati businessman, who was also responsible for the construction of the current mosque, according to Othsman Hassan, president of the Cambodian Muslim Development Foundation and secretary of state at the Labor Ministry.

Mr Hassan and Mr Al Serkal signed the $1 million agreement in Phnom Penh on Wednesday.

According to Mr Hassan, Mr Al Serkal had come to Cambodia to look into funding repairs to the current mosque, which is in poor condition, but decided instead to demolish it and build a new, much grander mosque in its place.

The new building, designed by an Omani architect, will have seating capacity for more than 1,000 people and will be known as Al Serkal Mosque, Mr Hassan said. It will be completed in about 18 months.

According to Mr Hassan, Mr Al Serkal has previously sponsored some Cambodian Muslims to make the hajj pilgrimage to Mecca and is considering funding another mosque in Phnom Penh's Meanchey district.

"Cambodia has good relations with the Middle East as well as Malaysia, Indonesia, Brunei," Mr Hassan explained, "because they know after Pol Pot, we need mosques and Islamic schools."

Mr Hassan expressed the hope that the mosque would act not only as a place of worship for Cambodian Muslims, but for Muslim tourists visiting the country.

San Mohamad, 80, an imam at the current mosque, said he welcomed the building of a new mosque as the old one had a leaky roof and was structurally unsound.

According to Mr Mohamad, about 500 worshippers regularly attend Friday prayers at the mosque, including diplomats from Muslim countries and Muslim tourists.

Haron Sary, 38, a Cham Muslim and driver, said that he takes customers to the mosque to pray every day.

"A new mosque will bring a lot of Muslim tourists," he said.

# វិហារអ៊ីស្លាមធំបំផុតនៅកម្ពុជានឹងសាងសង់នៅបឹងកក់ក្នុងក្រុងភ្នំពេញ

ដោយ : Kate Bartlett
THE CAMBODIA DAILY

ក្រុមមន្ត្រីបាននិយាយកាលពីម្សិលមិញថា ការសាងសង់ព្រះវិហារអ៊ីស្លាមដ៏ធំបំផុតនៅកម្ពុជាគ្រោងនឹងចាប់ផ្តើមនៃខែសីហា ។ អគារថ្មីដែលមានតម្លៃ១លានដុល្លារនេះនឹងជំនួសអគារបច្ចុប្បន្ននៅបឹងកក់ក្រុងភ្នំពេញ ដែលបានធ្លាក់ក្នុងសភាពទ្រុឌទ្រោម ហើយនឹងត្រូវបំផ្លាញចោល ។

យោងតាមលោក អូស្មាន់ ហាសសាន់ ជាប្រធានមូលនិធិអភិវឌ្ឍន៍មូស្លីមកម្ពុជា និងជារដ្ឋលេខាធិការក្រសួងការងារ បានឱ្យដឹងថា មូលនិធិនេះនឹងត្រូវផ្តល់ដោយលោក Sheik Eisa bin Nasseer bin Abdullatif Al Serkal ជាធុរជនជនជាតិអេមីរ៉ាត ដែលកំពុងទទួលបន្ទុកក្នុងការសាងសង់ព្រះវិហារបច្ចុប្បន្នណោះដែរនោះ ។

លោក ហាសាន់ និងលោក Al Serkal បានចុះហត្ថលេខាលើកិច្ចព្រមព្រៀងដែលមានទឹកប្រាក់១លានដុល្លារនៅក្នុងទីក្រុងភ្នំពេញកាលពីថ្ងៃពុធ ។

យោងតាមលោក ហាសាន់ បានឱ្យដឹងថា លោក Al Serkal បានធ្វើដំណើរមកកាន់កម្ពុជា ដើម្បីគិតគូរពីការផ្តល់មូលនិធិដល់ការជួសជុលព្រះវិហារបច្ចុប្បន្នដែលស្ថិតនៅក្នុងសភាពទ្រុឌទ្រោម ប៉ុន្តែផ្ទុយទៅវិញបានសម្រេចបំផ្លាញព្រះវិហារនេះចោលហើយក៏សាងព្រះវិហារថ្មីមួយដែលធំជាងនេះនៅកន្លែងដដែលតែម្តង ។

លោក ហាសាន់ បានមានប្រសាសន៍ អគារថ្មីនេះ ដែលគូរប្លង់ដោយស្ថាបត្យករជនជាតិអូម៉ង់ម្នាក់នោះ នឹងមានសមត្ថភាពទទួលមនុស្សបានជាង១.០០០ ហើយនឹងត្រូវដាក់ឈ្មោះថា ព្រះវិហារ Al Serkal ។ ព្រះវិហារថ្មីមនេះនឹងត្រូវសាងសង់បញ្ចប់ក្នុងរយៈពេលប្រហែល១៨ខែ ។

យោងតាមលោក ហាសសាន់ បានឱ្យដឹងថា លោក Al Serkal កាលពីមុនបានឧបត្ថម្ភដល់មូស្លីមកម្ពុជាមកមួយចំនួនក្នុងការធ្វើធម្មយាត្រាទៅទីក្រុង Mecca ហើយកំពុងតែពិចារណាផ្តល់មូលនិធិដល់ព្រះវិហារមួយទៀតនៅក្នុងខណ្ឌមានជ័យក្រុងភ្នំពេញ ។

លោក ហាសសាន់ បានពន្យល់ថា "កម្ពុជាមានទំនាក់ទំនងល្អជាមួយមជ្ឈឹមបូព៌ាព្រមទាំងម៉ាឡេស៊ី ឥណ្ឌូនេស៊ី និងប្រទេសប្រ៊ុយណេ ពីព្រោះពួកគេដឹងក្រោយពីរបប ប៉ុល ពត យើងត្រូវការព្រះវិហារ និងសាលារៀនអ៊ីស្លាម" ។

លោក ហាសសាន់ មានសង្ឃឹមថា ព្រះវិហារនេះនឹងមិនត្រឹមតែកន្លែងធ្វើសក្ការៈសម្រាប់មូស្លីមកម្ពុជាប៉ុណ្ណោះទេ ប៉ុន្តែក៏សម្រាប់ភ្ញៀវទេសចរមូស្លីមដែលមកលេងប្រទេសនេះផងដែរ ។

លោក សាន មហាម៉ាត់ អាយុ៨០ឆ្នាំ ជាមេបព្វជិតនៅព្រះវិហារបច្ចុប្បន្ននេះនិយាយថា លោកស្វាគមន៍ចំពោះការសាងសង់ព្រះវិហារថ្មីនេះ ព្រោះព្រះវិហារចាស់មានដំបូលលិចទឹកហើយមិនរឹងមាំទេ ។

យោងតាមលោក មហាម៉ាត់ បានឱ្យដឹងថា មានអ្នកធ្វើសក្ការៈប្រហែល៥០០នាក់មកចូលរួមជាប្រចាំក្នុងការសូត្រធម៌នៅថ្ងៃសុក្រនៅព្រះវិហារនេះ រួមទាំងអ្នកការទូតមកពីប្រទេសកាន់សាសនាអ៊ីស្លាមនានា និងភ្ញៀវទេសចរមូស្លីមផងដែរ ។

លោក ហារ៉ុន សារី អាយុ៣៨ឆ្នាំ ជាចាមមូស្លីម និងជាអ្នកបើកបរតែងនាំភ្ញៀវទៅកាន់ព្រះវិហារ នេះដើម្បីសូត្រធម៌ជារៀងរាល់ថ្ងៃ ។ គាត់បាននិយាយថា "ព្រះវិហារថ្មីនឹងនាំឱ្យមានភ្ញៀវទេសចរមូស្លីមកាន់តែច្រើន" ៕

## Conditions for Postponing Temple Talks Rejected

Thailand has rejected Phnom Penh's conditions for postponing discussion of Cambodia's management plan for Preah Vihear temple at a meeting of the World Heritage Committee in Paris, Thai news outlet MCOT reported yesterday. According to MCOT, Cambodia's delegation to the meeting said it would postpone the discussion if Thailand allowed international observers into a disputed area next to the temple. The observers were meant to monitor a cease-fire hammered out there in February. Cambodia and Thailand soon after agreed in principle to host Indonesian observers on either side of the disputed border, but Bangkok has thus far refused to accept the terms. Foreign Affairs spokesman Koy Kuong referred questions about the meeting to the Council of Ministers, where officials either said they had no information or could not be reached. Ahead of the meeting, Cambodian officials said they intend to move ahead with their plan for the temple, which became a World Heritage Site in 2008. Thailand has tried and failed to postpone discussion of the plan in the past. *(Zsombor Peter)*

## លក្ខខណ្ឌសម្រាប់ពេលចរចាអំពីប្រាសាទត្រូវបានច្រានចោល

ដោយ : Zsombor Peter
THE CAMBODIA DAILY

ប្រព័ន្ធផ្សព្វផ្សាយព័ត៌មានថៃ MCOT បានរាយការណ៍កាលពីម្សិលមិញថា ប្រទេសថៃបានច្រានចោលលក្ខខណ្ឌរបស់ក្រុងភ្នំពេញ ដើម្បីពន្យារពេលកិច្ចចរចារពីផែនការគ្រប់គ្រងរបស់កម្ពុជាលើប្រាសាទព្រះវិហារនៅកិច្ចប្រជុំមួយរបស់គណៈកម្មាធិការបេតិកភណ្ឌពិភពលោកក្នុងទីក្រុងប៉ារីស ។ យោងតាមប្រភពផ្សព្វផ្សាយនេះបានឱ្យដឹងថា គណៈប្រតិភូរបស់កម្ពុជា ដែលបានចូលរួមក្នុងកិច្ចប្រជុំនេះបានឱ្យដឹងថាខ្លួននឹងពន្យារពេលកិច្ចចរចារនេះ ប្រសិនបើប្រទេសថៃអនុញ្ញាតឱ្យក្រុមអ្នកអង្កេតការណ៍អន្តរជាតិចូលមកក្នុងតំបន់មានជម្លោះជាប់ប្រាសាទនេះ ។ ក្រុមអ្នកអង្កេតការណ៍មានបំណងត្រួតត្រាបទឈប់បាញ់គ្នាដែលបានធ្វើឡើងនៅទីនោះកាលពីខែកុម្ភៈ ។ ប្រទេសកម្ពុជា និងប្រទេសថៃមិនយូរប៉ុន្មាន បន្ទាប់ពីនោះ បានយល់ព្រមជាគោលការណ៍ដើម្បីទទួលយកក្រុមអ្នកអង្កេតការណ៍ឥណ្ឌូនេស៊ី មកឈរជើងសងខាងនៃព្រំដែនមានជម្លោះនេះ ប៉ុន្តែក្រុងបាងកករហូតមកដល់ពេលនេះ បានបដិសេធមិនព្រមទទួលយកលក្ខណៈនេះទេ ។ លោក គុយ គួង អ្នកនាំពាក្យក្រសួងការបរទេស បានបង្វែរសំណួរនានាទៅទីស្តីការគណៈរដ្ឋមន្ត្រីដែលមន្ត្រីនៅទីនោះខ្លះនិយាយថា ពួកគេមានបំណងបន្តផែនការរបស់ខ្លួនសម្រាប់ប្រាសាទនេះ ដែលបានក្លាយទៅជាបេតិកភណ្ឌពិភពលោកក្នុងឆ្នាំ២០០៨ ។ ប្រទេសថៃបានព្យាយាម ហើយបានបរាជ័យក្នុងការពន្យារពេលកិច្ចចរចាអំពីផែនការនេះកាលពីពេលកន្លងមក ៕

## ទម្រង់បោះឆ្នោត១០១៨នឹងត្រូវជំនួសអំឡុងពេលមានការរិះគន់

ដោយ : ផាង ម៉េងទៀង
THE CAMBODIA DAILY

ទំនងជាការឆ្លើយតបចំពោះការចោទប្រកាន់ជុំវិញការលួចបន្លំចុះឈ្មោះអ្នកបោះឆ្នោតនៅក្នុងការបោះឆ្នោតជាតិកាលពីឆ្នាំ២០០៨ គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតបានអះអាងកាលពីម្សិលមិញថា ខ្លួននឹងឈប់ប្រើទម្រង់បញ្ជាក់អត្តសញ្ញាណចាស់របស់ខ្លួន និងជំនួសមកវិញដោយទម្រង់ថ្មីឱ្យបានមុនការបោះឆ្នោតឃុំសង្កាត់ឆ្នាំក្រោយនេះ ។



ថ្លែងកាលពីម្សិលមិញនៅឯកិច្ចប្រជុំជាមួយនឹងគណបក្សនយោបាយក្នុងរាជធានីភ្នំពេញ លោក ទេព នីថា អគ្គលេខាធិការគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត បានមានប្រសាសន៍ថា ស្ថាប័នរបស់លោកនឹងប្រើទម្រង់១០១៨ ដែលត្រូវបានរិះគន់ជាទូទៅ ដែលជាឯកសារបញ្ជាក់អត្តសញ្ញាណមួយដែលចេញដោយសអាជ្ញាធរឃុំសង្កាត់ជូនដល់ប្រជាពលរដ្ឋដែលគ្មានទម្រង់បញ្ជាក់អត្តសញ្ញាណផ្សេងទៀត ។

លោក ទេព នីថា បានមានប្រសាសន៍ថា "យើង នឹងមិនប្រើទម្រង់១០១៨សម្រាប់ការបោះឆ្នោតលើកក្រោយទៀតទេ ។ វានឹងត្រូវបានជំនួសដោយទម្រង់ថ្មីមួយ ។ មានទម្រង់១០១៨ចំនួន២០០.០០០ ច្បាប់ត្រូវបានប្រើនៅក្នុងការបោះឆ្នោតជាតិឆ្នាំ ២០០៨ ដែលជាចំនួនតិចតួចបើប្រៀបធៀបនឹងចំនួនអ្នកបោះឆ្នោត៥លាននាក់ (របស់ប្រទេសកម្ពុជា) នោះ" ។

លោកបានមានប្រសាសន៍បន្ថែមទៀតថា ការចុះឈ្មោះអ្នកបោះឆ្នោត និងការពិនិត្យផ្ទៀងផ្ទាត់លើបញ្ជីឈ្មោះអ្នកបោះឆ្នោតឆ្នាំ២០១០នឹងផ្អែកទៅលើនីតិវិធីឆ្នាំ២០០៥ ប៉ុន្តែថាគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតនឹងសហការជាមួយនឹងក្រសួងមហាផ្ទៃក្នុងការចេញទម្រង់បញ្ជាក់អត្តសញ្ញាណថ្មី ដែលនឹងពិបាកក្លែងបន្លំជាងទម្រង់ថ្មី១០១៨ ។

លោកបានមានប្រសាសន៍ថា ទម្រង់ថ្មីនេះ "គឺប្រសើរជាងមុន ពីព្រោះវាពិបាកថតចម្លង ឬក្លែងបន្លំ ដោយបានបន្ថែមថា ទម្រង់ថ្មីចំនួន២៤០.០០០នឹងមានសម្រាប់ចៅសង្កាត់ និងមេឃុំដើម្បីចេញជូនប្រជាជនពលរដ្ឋ ។

(តទៅទំព័រទី ១៨)




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** (**តពីលេខមុន**)

•**៩ កក្កដា** : ប្រទេសសឹង្ហបុរី ចេញវិធានការណ៍ដកលិខិតឆ្លងដែនពីប្រជារាស្ត្រណាដែលរកស៊ីទំនាក់ទំនងដាក់ធននៅកម្ពុជា ។

•**១៥ កក្កដា** : ភាគីខ្មែរក្រហមវាយប្រហារលើខ្សែរថភ្លើងបាត់ដំបង-ភ្នំពេញ នៅភូមិទឹកផុស (ខេត្តកំពង់ឆ្នាំង) មានមនុស្សស្លាប់៥៣នាក់ ប្រមាណ ២០០នាក់រងរបួស ដែលក្នុងនោះភាគច្រើនទទួលមរណភាពនៅមន្ទីរពេទ្យ ។

•**១៦ កក្កដា** : ហ៊្សេនគន់ធ័រឌីន ដែលជាអគ្គរដ្ឋទូតអាមេរិក នៅភ្នំពេញ និងដែលបានចាកចេញពីភ្នំពេញនាឆ្នាំ១៩៧៥ ដោយអោបទង់ជាតិអាមេរិកលើទ្រូងគាត់ បានត្រឡប់មកភ្នំពេញវិញ កងបេសកកម្មមួយសម្រាប់ស្ថាប័នអេស៊ាន តិចណូឡូហ្ស៊ី ក្រុងបាងកក ។

•**១៦-១៧ កក្កដា** : មានកិច្ចប្រជុំសមាជិកអចិន្ត្រៃយ៍ទាំងប្រាំ (5P) នៅក្រុងប៉ារីស ស្ដីពីបញ្ហាកម្ពុជា ។ គេសង្កេតឃើញមានការលូតលាស់ខ្លះលើគម្រោងបង្កើតឧត្តមក្រុមប្រឹក្សាសន្តិសុខសម្រាប់ដោះស្រាយកម្ពុជា នឹងទំនាក់ទំនងពាក់ព័ន្ធទៅនឹងយោធា ។

•**១៨ កក្កដា** : លោក ហ្សេមបាគ័រ រដ្ឋលេខាធិការអាមេរិកាំង ផ្ដល់នូវសេចក្ដីថ្លែងការណ៍មួយ ។ សហរដ្ឋអាមេរិកសម្រេចគាំទ្ររដ្ឋាភិបាលជាតកម្ពុជា (G.N.S) ក្នុងការស្វែងរកកៅអីអ.ស.ប ក្នុងការពង្រីកប្រមូលរកជំនួយមនុស្សធម៌ និងផ្ដើមចរចារជាមួយក្រុងហាណូយជុំវិញបញ្ហាកម្ពុជា ។

•**២០ កក្កដា** : ការស្ដាប់សេចក្ដីរាយការណ៍ (Hearing) ក្នុងសភាអាមេរិកដ៏សំខាន់មួយកើតឡើងនៅព្រឹទ្ធសភាអ៊ុយអេស្ស ។ គេបានដឹងថា ចិនបានជួយភាគីខ្មែរក្រហមអស់ប្រាក់១០០លានដុល្លារជារៀងរាល់ឆ្នាំៗ នៅពេលដែលអាមេរិកចាយត្រឹមតែ ២៤លានដុល្លារសម្រាប់ជួយភាគីខ្មែរក្រហម ។ ក្រុមព្រឹទ្ធសភាជាច្រើនបានទាមទារឱ្យបញ្ឈប់ជំនួយដល់ភាគីខ្មែរក្រហម ។ កងកម្លាំងខ្មែរក្រហមមានប្រមាណ ៣-៤ម៉ឺននាក់ ។ លោកព្រឹទ្ធសភា ហ្សេនគែរី យល់ថាទោះជាយ៉ាងណា ភាគីខ្មែរក្រហមនៅតែទទួលបានចំណេញពីសហរដ្ឋអាមេរិកលើបញ្ហានេះ ។

•**២៤ កក្កដា** : ក្រុមរដ្ឋមន្ត្រីក្រសួងការបរទេសសមាគម ASEAN កោះហៅប្រជុំរវាងភាគីខ្មែរមានជម្លោះទាំងបួន ក្នុងគោលបំណងស្វែងរកការពង្រឹងគោលការណ៍រដ្ឋបាលនៃឧត្តមប្រឹក្សាសន្តិសុខ (G.N.S) ។ កិច្ចប្រជុំនេះ បង្ហាញការខកចិត្តនៅលើសេចក្ដីសម្រេចរបស់អាមេរិកាំង កាលពីថ្ងៃទី១៨ ខែកក្កដា ។ ចិន ក៏បានស្មារតីដូច្នេះដែរ ។

•**២២ កក្កដា** : សមាជិកជាន់ខ្ពស់ខ្មែរក្រហម ៣០នាក់ ក្នុងចំណោមពួកគេឯទៀត ប្រមាណជាង ១៦០នាក់ ដែលបានសុំសេរីភាពក្នុងការធ្វើចរាចរ (បុគ្គលនីមួយៗ) សិទ្ធិធ្វើទំនាក់ទំនងជាមួយបរទេស សិទ្ធិអនុវត្តន៍គោរពព្រះពុទ្ធសាសនា ត្រូវបានគេសម្លាប់ចោលក្នុងតំបន់ "១០០៣" ដែលស្ថិតក្រោមការគ្រប់គ្រងរបស់ តាម៉ុក ។

•**៥ សីហា** : លោក ហ្សេម បាគ័រ ផ្សាយឱ្យដឹងមានការជួបប្រជុំចរចារគ្នានៅក្រុងវៀងច័ន្ទ (ឡាវ) រវាងសហរដ្ឋអាមេរិក និងរដ្ឋកម្ពុជា ។

•**២២ សីហា** : ពួកត្រីភាគីនៃរដ្ឋាភិបាលជាតិកម្ពុជា (GNC) និយាយថា ត្រៀមខ្លួនជាស្រេចហើយនឹងចូលប្រជុំជាមួយភាគីរដ្ឋកម្ពុជា ដើម្បីឈានទៅរកការបង្កើតឧត្តមក្រុមប្រឹក្សាសន្តិសុខមួយ ដែលត្រូវក្លាយជាអង្គការផ្ទែករចនាសម្ព័ន្ធរដ្ឋបាល (ត្រីស្ថាន) តែមួយគត់ និងជាប្រភពប្រព័ន្ធអំណាចនៃប្រទេសកម្ពុជា នៅក្នុងពេលវេលាបណ្ដោះអាសន្ននេះ ។

•**២៧-២៨ សីហា** : ការប្រជុំរវាងសមាជិកអចិន្ត្រៃយ៍ (P5) នៅក្រុងញូវយ៉ក ។ មានការទទួលយកបាននូវការបង្កើតខ្នាតដែលហៅថា "កិច្ចព្រមព្រៀងសរុប" (Accord codre) សម្រាប់ជាគោលការដោះស្រាយផ្លូវនយោបាយរួម ។ រដ្ឋាភិបាលជាតិកម្ពុជា រ.ជ.ក (GNC) ទទួលយល់ព្រម ប៉ុន្តែភាគីរដ្ឋកម្ពុជា បង្ហាញការប្រកាន់ថា មានការលំអៀងពីសំណាក់ អ.ស.ប ដោយលើស្រង់ចម្ងល់ពីភាពប្រាកដនិយមមួយ ក្នុងការដងអាវុធចេញពីភាគីខ្មែរក្រហម ដោយ អ.ស.ប ។

•**២៩ សីហា** : នៅក្រុងហ្សឺណែវឯណោះវិញ អនុកម្មាធិការជំនាញផ្នែកសិទ្ធិមនុស្សនៃ អ.ស.ប មិនទទួលពិនិត្យគម្រោងដំណោះស្រាយមួយ ដែលពាក់ព័ន្ធទៅនឹងអំពើយង់ឃ្នងទាំងឡាយ ដែលមានកម្រិតស្មើនឹងការប្រល័យពូជសាសន៍ ជាពិសេសក្នុងជំនាន់ការគ្រប់គ្រងរបស់ខ្មែរក្រហម ។

•**កញ្ញា** : ការស្ថាប័នផ្លូវយុទ្ធសាស្ត្រមួយ បានធ្វើឡើងនៅចន្លោះស្រុកតាប៉ប្រាយ៉ា (ថៃឡង់) និងតំបន់អតីតសេនាធិការដ្ឋានយោធាកង រ.ជ.រ.ប.ខ (KPNLF) ឆ្ពោះទៅស្រុកថ្មពួក (កម្ពុជា) ។

**(នៅមានតលេខក្រោយទៀត)**






# ពុទ្ធប្បវត្តិអមដោយរូបភាព

# A Pictorrial Biography of Saky amuni Buddha

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

❖ Original Illuatration and Naration in Thai by Gunapayuta.
❖ Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖ Translation into Khmer by Bhikkhu Kong Am.

**១៣១-** ពេលដែលព្រះពុទ្ធជាម្ចាស់គង់នៅក្នុងមិគទាយវ័ន មានបុរសម្នាក់ឈ្មោះ **យស** ជាកូនរបស់មហាសេដ្ឋីម្នាក់នៅស្រុកពារាណសី ថ្ងៃមួយមានការនឿយហត់ធុញទ្រាន់ចំពោះគ្រួសារ និងជីវិតរស់នៅដែលពោរពេញទៅដោយតម្រេកតណ្ហា ជាមួយពួកស្រីជាច្រើនបានកើនឡើងកាន់តែខ្លាំងឡើងៗ ។ គាត់ក៏បានលួចរត់ចេញពីផ្ទះដោយស្ងៀមស្ងាត់មិនឱ្យអ្នកណាម្នាក់ដឹង ហើយក៏បានជួបនឹងព្រះពុទ្ធជាម្ចាស់នៅតាមផ្លូវ ។ ដោយបានស្ដាប់ធម៌ព្រះពុទ្ធបរមគ្រូសំដែង និងដោយបានយល់ជាក់ច្បាស់អំពីផលប្រយោជន៍នៃការប្រតិបត្តិធម៌ គាត់ប្រែជាមានចិត្តសប្បាយរីករាយរួចបានថ្វាយបង្គំទូលសុំ សេចក្ដីអនុញ្ញាតលះបង់ផ្ទះសម្បែងដើម្បីបានប្រតិបត្តិធម៌ជាមួយព្រះពុទ្ធអម្ចាស់ ។ នៅថ្ងៃជាមួយគ្នានោះ បិតាយសដែលបានតាមរកកូនក៏បានជួបនឹងព្រះពុទ្ធ ហើយបានទូលសួរព្រះអង្គអំពីកូនរបស់គាត់ ។ ព្រះ សម្មាសម្ពុទ្ធបរមគ្រូទ្រង់បានទេសនាទូន្មានគាត់នូវបញ្ហាធម៌ដ៏សមរម្យ ញ៉ាំងគាត់ឱ្យបានយល់ធម៌ ពេលនោះគាត់កើតមានចិត្តសប្បាយរីករាយក្នុងធម៌ រួចហើយក៏យល់ព្រមអនុញ្ញាតឱ្យកូនមកបួស ។



131- While the Buddha was in Mrgadava, a young man named Yasas, who was the son of a millionaire of Varanasi, suddenly one day grew tired of his family and of his lustful life with many women. He ran away from home secretly and happened to meet the Buddha on his way. Upon hearing the Buddha preach and on learning the benefits of Dharma practice, he became exultant and requested permission to leave home and practice with the Buddha. On the same day, Yasas's father, in search of his son, met the Buddha and asked him about his son. The Buddha instructed him on appropriate points of the dharma causing him to understand and joy arose in the and allowed his son to leave home and become a monk.

**១៣២-** ក្រោយពីបានស្ដាប់ព្រះធម៌ព្រះអង្គសេដ្ឋីមានបីតិបាមោជ្ជៈសប្បាយក្រៃលែង រួចគាត់ក៏បានព្រះពុទ្ធ ព្រះធម៌ជាទីពឹងទីរលឹកបានតាំងសេចក្ដីប្រាថ្នាសុំឱ្យបានជាឧបាសកម្នាក់ក្នុងព្រះពុទ្ធសាសនា និងបានគោរពប្រតិបត្តិតាមព្រះពុទ្ធគ្រប់ៗជាតិ ។ បន្ទាប់មកគាត់ក៏បាននិមន្តព្រះសម្ពុទ្ធ និងព្រះយលភិក្ខុទៅផ្ទះរបស់គាត់ដើម្បីទទួលភត្តនៅវេលាព្រឹកស្អែក ។ ក្រោយមកទៀត កល្យាណមិត្ត៤នាក់របស់ព្រះយសក៏បានមកបួសជាភិក្ខុតាមព្រះយស ហើយភិក្ខុមទាំង៤អង្គបាននាំសំលាញ់៥០នាក់មកពីត្រកូលអភិជនមកបួសជាភិក្ខុក្នុងព្រះពុទ្ធសាសនាផងដែរ ។ ដោយពុំចាំបាច់មានការត្រួតត្រាពីព្រះពុទ្ធជាម្ចាស់ទាល់តែសោះ ភិក្ខុទាំងឡាយខិតខំព្យាយាមសិក្សារៀនសូត្រដោយព្រះទ័យទុកដាក់ និងប្រតិបត្តិដោយហ្មត់ចត់បំផុត ។ មិនយូរប៉ុន្មានពួកភិក្ខុទាំងអស់ក៏បានសម្រេចជាព្រះអរហន្តគ្រប់ៗអង្គ ។



132- After hearing the Buddha preach, the rich man was very happy and he also took refuge in the Buddha-dharma, and he expressed his wish to be a Buddhist lay follower and follow life after life the Buddha-dharma. He then invited the Buddha and Yasas to his home on the next morning for an offering. Later, four Yasas' best friends also left home and became Buddhist bhikkhus and they, in turn, led fifty young men of noble families to become Buddhist bhikkhus. Without the need of the Buddha's supervision, they all learned diligently and practiced strictly and before long, they all attained the stage of arhant.

**១៣៣-** នោពេលដែលព្រះពុទ្ធទ្រង់បានភិក្ខុសាវ័ក ៦០អង្គ ព្រះអង្គទ្រង់ប្រារព្ធកិច្ចប្រជុំមួយដើម្បីឱ្យភិក្ខុទាំងអស់និមន្តទៅផ្សព្វផ្សាយព្រះធម៌ ។ ព្រះអង្គទ្រង់ត្រាស់ថា "ម្នាលភិក្ខុទាំងឡាយ! តថាគត បានរួចរំដោះផុតពីចំណងទាំងឡាយនៃមនុស្ស និងទេវតាហើយ អ្នកទាំងឡាយក៏ដូច្នោះដែរ ។ ឥឡូវនេះ ចូរអ្នកទាំងឡាយទៅផ្សព្វផ្សាយព្រះធម៌នៅតាមតំបន់ផ្សេងៗ ដើម្បីឱ្យប្រជាជនកាន់តែច្រើនឡើងៗទៀតមានឱកាសទទួលយកនូវប្រយោជន៍ និងសេចក្ដីសុខដូចគ្នា ។ អ្នកមិនត្រូវត្រាច់ទៅមានផ្លូវពីរនាក់ក្នុងផ្លូវតែមួយទេ ។ ចូរខំផ្សាយព្រះធម៌ទៅគ្រប់ទិសទីទាំងអស់ ដើម្បីឱ្យមនុស្សទាំងឡាយអាចបានដុះខាត់សំអាតចិត្តនឹងទទួលនូវពន្លឺព្រះធម៌ ។ មានមនុស្សខ្លះក្នុងសន្និវាសនេះជាអ្នកមានកាម កិលេសស្រាលស្តើង និងតណ្ហាតិច ។ មនុស្សបែបនេះ កាលបើមិនបានស្ដាប់ព្រះធម៌ទេ មានន័យថាគេនឹងត្រូវខាតបង់ប្រយោជន៍ដ៏ធំធេង ។ គេជាមនុស្សរង់ចាំតែព្រះធម៌ប៉ុណ្ណោះ ហើយគេនឹងបានយល់ព្រះធម៌យ៉ាងច្បាស់ ។ ទុកឱ្យតថាគតទៅសំដែងនៅឧរុវេលប្រទេស" ។

**(នៅមានតលេខក្រោយទៀត)**



133- When the Buddha had sixty bhiksus among his disciples, he held a meeting directing the bhiksus to propagate the dharma. The Buddha said: Bhikkhus! I have been released from all the bondages of mankind and devas, and you have been released also. Now you are going to propagate to Dharma to other places to give more people the chance of having the same benefit and happiness. No two of you should go the same way. Be sure to spread the dharma to all places far and near so that human life may be purified and brightened. There are people in the world who have light passion and little desire. To such people, missing the opportunity to hear dharma means great lost of benefit. there are people ready for dharma, and they will be able to understand it clearly. I myself will go out to preach at Uruvilva."

*(Continued to After Issue)*

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន




ដោយ : ម៉ម យឹន

●រួចហើយក្បៀវប្រជាពលរដ្ឋខ្មែរឱ្យចាកចេញពីភូមិស្រុកទៅនៅក្នុងព្រៃ ដើម្បីបង្ហាត់បង្រៀន និងបញ្ចូលមនោគមវិជ្ជាកុម្មុយនីស្តឱ្យរួមដៃវាយប្រយុទ្ធទៅលើកងទ័ពស្នេហាជាតិខ្មែរវិញ ហើយដណ្តើមអំណាចយកមកថ្វាយប្រមុខរដ្ឋខ្មែរ ពីមុននោះឱ្យបានក្នុងពេលឆាប់ៗនេះវិញ ។

ចម្បាំងនៅក្នុងស្រុកបានឆាបឆេះយ៉ាងសន្ធោសន្ធៅខ្លាំងឡើង ដោយសារអតីតប្រមុខរដ្ឋបានបញ្ឆេះឡើងសម្រាប់ឱ្យនៅក្នុងសង្គមប្រទេសយួននេះឃើញមានសកម្មភាពមួយដែលផ្ទុយគោលបំណងរបស់សន្ធិសញ្ញាអន្តរជាតិ ដែលចែងពីការតំកល់ខ្លួនឱ្យនៅក្នុងភាពជាប្រទេសអព្យាក្រិត្យឥតលំអៀងអស់ទៅហើយដោយសារនៅពេលនោះមានគណៈ-កម្មាធិការត្រួតពិនិត្យអន្តរជាតិមួយ បានតែងតាំងឡើងមានសមាជិក៣ប្រទេសគឺ កាណាដា តំណាងឱ្យលោកសេរីប្រទេសប៉ូឡូញ តំណាងឱ្យប្រទេសសង្គមនិយម និងប្រទេសឥណ្ឌាតំណាងឱ្យប្រទេសអព្យាក្រិត្យសម្រាប់តាមដានត្រួតពិនិត្យអព្យាក្រិត្យរបស់ខ្មែរក្នុងក្តីហ្មត់ចត់ និងយុត្តិធមិបំផុត ។

គណកម្មាធិការអន្តរជាតិនេះ បានដឹងថា ប្រមុខរដ្ឋខ្មែរ ពុំបានគោរពដល់សន្ធិសញ្ញានៃទីក្រុងហ្សឺណែវនោះទេ ទើបសុំទៅប្រមុខរដ្ឋខ្មែរ ឱ្យបញ្ឈប់សកម្មភាពខុសពីសន្ធិសញ្ញានៅទៅ ប៉ុន្តែប្រមុខរដ្ឋខ្មែរ បានប្រកាសបដិសេធថា ពុំបានមានធ្វើអ្វីដែលខុសទេ ការធ្វើទាំងនោះ គឺជារឿងរបស់ខ្មែរត្រូវតែធ្វើសម្រាប់ជាគុណប្រយោជន៍ដល់ប្រទេស និងជនជាតិខ្មែរទាំងអស់ ទោះបីជាគណកម្មាធិការរកឃើញភស្តុតាងយ៉ាងជាក់ស្តែងយ៉ាងណាក៏ដោយ ។ ដោយទ្រាំនឹងការធ្វើខុសឆ្គងរបស់ប្រមុខរដ្ឋខ្មែរនេះពុំបាន ទើបគណកម្មាធិការអន្តរជាតិនេះ សម្រេចចិត្តដកចេញពីប្រទេសខ្មែរ ទុកឱ្យប្រមុខរដ្ឋខ្មែរ បន្តកិច្ចការនេះដោយសេរីតទៅទៀតចុះ ។

**ឯករាជ្យខ្មែរត្រូវរងគ្រោះថ្នាក់**

ក្រោយពីពេលដកចេញនៃគណកម្មាធិការអន្តរជាតិមក ភ្លើងសង្គ្រាមនៅក្នុងប្រទេសយួនខាងត្បូងបានឆាបឆេះរាលដាលកាន់តែខ្លាំងឡើង រហូតធ្វើឱ្យអសន្តិសុខនៅតាមបណ្តោយព្រំដែនខ្មែរ-យួនមានការកើនឡើងកាន់តែខ្លាំងក្លាដែរ ដោយសារតែកងទ័ពព្រៃយួនយៀកកុង បានយកទឹកដីខ្មែរតាមជាយដែនធ្វើជាជម្រកពួនគេចពីការវាយប្រហារយ៉ាងខ្លាំងក្លា សឹងតែរកកន្លែងណាមួយជាទីឈរជើងនៃពួកទ័ពព្រៃយួនពុំបានឡើយ ។

តើហេតុអ្វីបានជាកងទ័ពព្រៃយួនយៀកកុងអាចប្រើប្រាស់ទឹកដីខ្មែរ ធ្វើជាទីជម្រកបានដូច្នេះ ? បើសន្ធិសញ្ញាក្រុងហ្សឺណែវ បានកំណត់ឱ្យប្រទេសខ្មែរត្រូវតែប្រកាន់នយោបាយអព្យាក្រិត្យឥតលំអៀងមិនត្រូវចូលដៃ និងអនុញ្ញាតឱ្យកងទ័ពជាតិដទៃណាមួយមកបោះទីតាំង ធ្វើសកម្មភាពលើទឹកដីខ្មែរបានឡើយ ដើម្បីធ្វើឯករាជ្យនៃប្រទេសខ្មែរបានស្ថិតស្ថេរចេរកាលតទៅ ។

ប៉ុន្តែដោយសារតែមានសកម្មភាពកងទ័ពព្រៃយួនយៀកកុង កើតមានពាសពេញនៅលើប្រទេសខ្មែរដូច្នេះ ធ្វើឱ្យឯករាជ្យនៃប្រទេសខ្មែរ ត្រូវបានរំលោភឈ្លានពានពីប្រទេសយួនកុម្មុយនីស្ត ដែលបានចូលរួមចុះហត្ថលេខាក្នុងសន្ធិសញ្ញាព្រមព្រៀងគ្នានាទីក្រុងហ្សឺណែវនោះពេញទីហើយ រីឯចប្រមុខរដ្ឋក៏មានឈ្មោះថា បានបំផ្លាញឯករាជ្យប្រទេសខ្លួនឯង ដោយស្វ័យប្រវត្តិដែរ ។

ដោយមើលឃើញវិបត្តិនយោបាយធំៗទាំងនេះកើតឡើងហើយ ទើបធ្វើឱ្យកងទ័ពជាតិខ្មែរ គ្រប់អង្គភាព បញ្ញាវន្តគ្រប់ជាន់ថ្នាក់ ប្រជាពលរដ្ឋខ្មែរគ្រប់ស្រទាប់វណ្ណៈ មានការព្រួយបារម្ភ និងកង្វល់ក្នុងចិត្តយ៉ាងខ្លាំង ដោយឃើញថា ព្រឹត្តិការណ៍ដែលលេចចេញមកនេះ ប្រាកដជាដើមហេតុបណ្តាលឱ្យប្រទេស និងប្រជាជាតិខ្មែរ ត្រូវប្រឈមមុខនឹងវិបត្តិភ័យមួយយ៉ាងធ្ងន់ធ្ងរ រហូតឈានទៅដល់ធ្វើឱ្យមានមហន្តរាយទៅអនាគតដ៏ខ្លីខាងមុខជាពិតប្រាកដជៀងពុំរួចឡើយទៀតផង ។

មិនយូរប៉ុន្មានសភាពប្រែប្រួលនៃសេចក្តីសុខសាន្ត សប្បាយរីករាយ និងសេចក្តីសង្ឃឹមរបស់ជនជាតិខ្មែរ ត្រូវបានរលាយទៅ០ាត់បន្តិចម្តងៗជារៀងរាល់ថ្ងៃ ។ បញ្ហាវិបត្តិនយោបាយបានចោទយ៉ាងធ្ងន់ធ្ងរដល់រដ្ឋាភិបាលរបស់ចលនាសង្គមរាស្ត្រនិយមដែលមានប្រមុខរដ្ឋខ្មែរជាប្រធាន ធ្វើឱ្យរដ្ឋាភិបាលត្រូវបានផ្លាស់ប្តូរនាយករដ្ឋមន្ត្រីច្រើនលើកច្រើនគ្រា



រហូតមកដល់តំណាក់ការក្រោយនាអំឡុងឆ្នាំ១៩៧០ ប្រមុខរដ្ឋខ្មែរបានបញ្ជាឱ្យបង្កើតរដ្ឋាភិបាលពិសេសមានឈ្មោះថា "រដ្ឋាភិបាលស្រោចស្រង់ជាតិ" មានន័យថា បញ្ហាប្រទេសខ្មែរ ត្រូវធ្លាក់ដល់កំរិតមួយជាភាពអាសន្នដ៏មហាគ្រោះថ្នាក់ហើយ ហើយត្រូវការឱ្យមានមនុស្សពិសេសមកជួយស្រោចស្រង់ឱ្យបានរួចផុតពីភាពអាសន្នដ៏មហាគ្រោះថ្នាក់នេះ ។

**ការបង្កើតរដ្ឋាភិបាលស្រោចស្រង់ជាតិ**

- តើបុគ្គលសំខាន់ណាមួយដែលត្រូវបានតែងតាំងជានាយករដ្ឋមន្ត្រីពិសេស ដើម្បីដឹកនាំរដ្ឋាភិបាលពិសេសនេះ ?

លោកសេនាប្រមុខ លន់ នល់ ដែលជាមេទ័ពម្នាក់ក្នុងចំណោមមេទ័ពជាច្រើន ធ្លាប់មានវិរភាព និងភក្តីភាពចំពោះជាតិ និងមហាក្សត្រ បានត្រូវប្រមុខរដ្ឋខ្មែរ តែងតាំងឱ្យទទួលតំណែងវិសេសដ៏មានគ្រោះថ្នាក់នេះ ។ **(នៅមានតលេខក្រោយទៀត)**

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

•និងចាប់ផ្ដើមដំណើរការបញ្ចេញឥទ្ធិពលដ៏ស័ក្ដិសិទ្ធិមកលើរូបខ្ញុំហាក់ប្រៀបដូចជាគេបញ្ចូលឱសថទិព្វមកក្នុងខ្លួន ។ នេះជាអព្ភូតហេតុដ៏អស្ចារ្យ (Miracle ) ក្នុងជីវិតខ្ញុំ ។

ខ្ញុំសូមលើកឧទាហរណ៍ជាក់ស្ដែងបញ្ជាក់ជូនបន្ថែមដូចតទៅ :

មុនការអនុវត្តន៍សមាធិវិបស្សនា ពេលដែលរឿងរ៉ាវពីអតីតកាលផុះឡើងក្នុងចិត្តម្ដងៗ ខ្ញុំពិសោធន៍ទុក្ខសោក ក្រៀមក្រំដ៏ធំធេងពុំអាចរៀបរាប់បានហាក់ដូចជាខ្ញុំត្រូវគេរុញច្រានទំលាក់ជ្រោះដ៏សែនជ្រៅ (ភ័យលោះព្រលឹង) ឬក៏ហាក់ដូចជាគេយកខ្សែភ្លើងអគ្គិសនីមកដាក់ឱ្យឆក់លើខ្លួនប្រាណ រោលរាលអន្ទះអន្ទែង រហូតដល់ខ្ញុំសន្លប់ ។ ហើយសភាពដ៏រន្ធត់នេះ កើតមានច្រំដែលៗរាប់រយរាប់ពាន់ដងក្នុងមួយថ្ងៃៗ ។ ខ្ញុំពិសោធន៍ភ្នែកស្រស់នូវភ្លើងនរកអវិចីរាប់ម៉ឺនលានជាន់ ។ ពេលនោះខ្ញុំគ្មានសង្ឃឹមនឹងរកច្រកចេញរួចពីគុកងងឹតសូន្យសុងនេះឡើយ ។ ក្រោយពេលប្រតិបត្តិសមាធិ ពន្លឺនៃក្ដីសង្ឃឹមនិងជីវិតរស់រានបានលេចឡើងពិតប្រាកដ ។ មូលហេតុចំបងនិងជាយុទ្ធសាស្ត្រ គឺបច្ចេកទេសសមាធិបានបណ្ដុះទម្លាប់ថ្មីបង្កើតយន្តការថ្មីក្នុងខ្លួនខ្ញុំ ដូចជា :

**ទី១-** ខ្ញុំរៀនពិនិត្យបាតុភូតរូបកាយ និងចិត្តដោយឧបេក្ខា -Awareness and recognition with balance- វិធីផ្ដាច់អារម្មណ៍ពីចរន្តបាតុភូតផ្លូវចិត្ត ។

**ទី២-** ខ្ញុំរៀនទម្លាប់ទទួលយកពុំប្រកែកប្រណាំងប្រជែងតវ៉ានឹងវាសនាដូចមុនទៀតទេ -complete Acceptance and complete surrender- (ចង្វាក់ប្រតិកម្មពីមុនពុះកញ្ជ្រោល ឥឡូវទ្រោមចុះរហូតដល់ស្ងប់ឈឹង សន្ដិភាពកើតមានពាសពេញរូបកាយនិងផ្លូវចិត្ត ពីព្រោះសង្គ្រាមបានរលត់ហើយ )។

**ទី៣-** ខ្ញុំទម្លាប់ឈប់ដើរតួក្លែងក្លាយក្នុងរឿងរ៉ាវអាស្រូវនោះៗទៀត (Non-identification with the past memories) (រឿងរ៉ាវទាំងអស់ដែលលេចឡើងក្នុងអារម្មណ៍ខ្ញុំ វាគ្រាន់តែជាស្រមោលអតីតកាលប៉ុណ្ណោះ វាគ្រាន់តែជាការឆ្លុះបញ្ចាំងពីបន្ទប់មេម៉ូរីប៉ុណ្ណោះ ។ ទាំងនេះសបញ្ជាក់នូវច្បាប់ព្រះពុទ្ធសាសនាត្រង់ចំណុច អនត្តា ថាអ្វីៗពុំមែនជា «ខ្ញុំ» ពុំមែនជា «របស់ខ្ញុំ» ទេ ឬសាសនា ចិន zen គេហៅបាតុភូតនេះថា ទទេ Empty ) ។

**ទី៤-** ខ្ញុំទម្លាប់ពិនិត្យស្រាវជ្រាវបាតុភូតកាយ និងចិត្តទាំងមូល investigation of the entire phenomenon of the body and mind moment by moment (ភ្នែកខាងក្នុងខ្លួនបានបើកជាប្រចាំ Awareness and recognition ឃ្លាំមើលគ្រប់វិនាទីនូវស្ថានភាពពុំប្រក្រតីណាមួយកើតឡើង គេនឹងមានវិធានការដោះស្រាយទាន់ហន់នៅនឹងកន្លែងពុំពន្យាពេលឱ្យពន្លកនៃឋាមពលខ្មៅរីកដុះដាល កែនកងរេពលរបស់វាមកបាន ។ ខ្ញុំអាចប្រៀបធៀបខ្លួនខ្ញុំទៅនឹងម៉ាស៊ីនកំព្យូទ័រ ដែលត្រូវបានការពារជាប្រចាំដោយបញ្ចូលប្រក្រាមអង្ទីវីរីស (Anti-virus program ) ។

តាមរបៀបនេះ ឥទ្ធិពលនៃម៉េម៉ូរីពីមុនវាបង្ហាញរូបដូចជាខ្លាពិតប្រាកដ ប៉ុន្តែឥឡូវនេះវាជាខ្លាក្រដាសអស់អំណាចគ្របសង្កត់មកលើខ្ញុំទៀតហើយ ។ បើនិយាយម្យ៉ាងទៀត ម៉េម៉ូរីពីអតីតកាលនៅតែមានក្នុងចិត្ត ពុំអាចបំភ្លេចបានឡើយ ប៉ុន្តែចំពោះខ្ញុំពេលនេះវាគ្រាន់តែរឿងប្រឌិតពីម៉េម៉ូរីប៉ុណ្ណោះ ។ ពីមុនឥទ្ធិពលខ្មៅរបស់ម៉េម៉ូរីបានគ្របដណ្ដប់ដល់កំរិត១០០ភាគរយ លុះប្រតិបត្តិសមាធិយូរៗទៅវាថយចុះជាលំដាប់មក៩០ភាគរយ មក៨០ភាគរយ មក៧០ភាគរយរហូតដល់ស្ទើរតែគ្មានឥទ្ធិពល ។ (គ្រាប់ពូជទុក្ខវេទនា ដែលកប់ទុកយ៉ាងជ្រៅក្នុងបន្ទប់ម៉េម៉ូរី ហើរឡើងមកផ្ទៃលើនៃចិត្តហើយ ក៏រដករលាយបាត់ទៅវាលែងក្លាយជាគ្រាប់ពូជថ្មីសំរាប់ការបង្កបង្កើតកូនពូនជាចៅដូចមុនៗទៀត (The previous suffering seed becomes dried and seedless) ខ្ញុំត្រូវរួចរដោះទាំងស្រុងពីម៉េម៉ូរីចាស់ ឬហៅម្យ៉ាងទៀតថាកម្មចាស់ត្រូវរលំរលាយបាក់ស្រុតទាំងផ្ទាំងៗ ពីប្រព័ន្ធរូបកាយនិងចិត្តខ្ញុំ នេះជាខ្លឹមសារនៃការពិសោធន៍ព្រះនិព្វានក្នុងរូបជាមនុស្សនេះ គឺជាអព្ភូតហេតុដ៏អស្ចារ្យ ។ នេះសបញ្ជាក់អំពីពាក្យដែលលោកគ្រូ ហ្គោឥនកាសំដែងថា ការវះកាត់ដ៏ស៊ីជំរៅដល់ឫសគល់នៃទុក្ខវេទនារបស់មនុស្ស។ ព្រឹត្តការណ៍បែបនេះ ខួរក្បាលមនុស្សពុំអាចចាក់យល់បានឡើយ មានតែអនុវត្តពិសោធន៍ជាក់ស្ដែងប៉ុណ្ណោះ ទើបជ្រាបបាន ពីព្រោះនេះជាសង្គ្រាមក្នុងពិភពអរូបីយ (The War in the invisible world) ។

**១៤- សមាធិមេត្តាភាវនា**

ក្នុងកម្មវិធីសមាធិវិបស្សនា១០ថ្ងៃសិស្សតម្រូវឱ្យអនុវត្តផ្សាយមេត្តាភាវនាដល់មនុស្សសត្វទាំងពួងក្នុងពេលមួយថ្ងៃចុងក្រោយបង្អស់ ។ ហើយរាល់ពេលហាត់អង្គុយសមាធិម្ដងៗ សិស្សត្រូវបណ្ដុះទម្លាប់ផ្សាយមេត្តានេះ ជារៀងរាល់ពេល ។ ជាក់ស្ដែងការផ្សាយមេត្តានេះបានដល់ :

ទី១- ការសំដែងការអនុគ្រោះទោសកំហុសទាំងឡាយដល់ខ្លួនឯងផ្ទាល់ និងដល់អ្នកដទៃ និងសំដែងការដឹងគុណចំពោះរូបកាយខ្លួនផ្ទាល់ និងអ្នកដទៃ (Express gratitude and Forgive himself and others) ។

ទី២- ផ្សាយមេត្តាករុណាដល់ខ្លួនឯងផង និងដល់អ្នកដទៃ និងដល់សព្វសត្វ ទាំងឆ្ងាយ ឬជិត មានរូប ឬគ្មានរូបតូច ឬធំដោយឧទ្ទិសសូមឱ្យគេទាំងឡាយរួចផុតទុក្ខសោកទាំងពួង បានរួចរដោះទាំងកាយនិងចិត្តជួបនឹងសេចក្ដីសុខ បរមសុខ និងសុភមង្គលគ្រប់ប្រការ (Express loving kindness to himself and others ) ។

ខ្ញុំសូមកត់សំគាល់វិធីខាងលើនេះដូចតទៅ :

- ដូចខ្ញុំបានអធិប្បាយក្នុងវគ្គកុងស្សនិសពេលដឹងខ្លួនស្រាប់ បន្ទប់ម៉េម៉ូរីមនុស្សយើងបានបង្កប់នូវទិដ្ឋភាពពិសពុលយ៉ាងច្រើនឥតគណនា ។

(នៅមានតលេខក្រោយទៀត)



# ជោគជតារាសីទាំង១២ប្រចាំឆ្នាំថោះ



**ឆ្នាំជូត**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាតវៃ បើបានជួបពិគ្រោះពិភាក្សាការងាររកស៊ីនឹងឆាប់និយាយត្រូវរ៉ូវ និងមានការចុះសម្រុងនឹងគ្នា ។ ចំពោះគូស្នេហ៍ប្រកបទៅដោយភាពផ្អែមល្ហែមដាក់គ្នាជានិច្ច ។

**ឆ្នាំឆ្លូវ**
រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងជម្លោះកើតឡើងចូរចេះអត់ធ្មត់ និងរងាប់ចិត្តឱ្យបានត្រជាក់ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ។

**ឆ្នាំខាល**
រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកម្ភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ។ ចំពោះគូរស្នេហ៍ក្នុងរយៈពេលនេះ ត្រូវតែចេះអត់ឱនឱ្យគ្នាទៅវិញទៅមក ទើបមិនអាចប្រេះឆាគ្នាបាន ។

**ឆ្នាំថោះ**
រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វើប្រហែសឱ្យសោះ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មិនត្រូវឆាប់ត្រចៀកទន់ជឿសម្តីញុះញង់របស់អ្នកផ្សេងឡើយ ទើបបានសុខកាយសប្បាយចិត្ត ។

**ឆ្នាំរោង**
រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះ មិនត្រូវនិយាយស្តីប៉ប៉ាច់ប៉ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ក្នុងរយៈពេលនេះដែរ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលមកជ្រៀតជ្រែក ។

**ឆ្នាំម្សាញ់**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវវៀសវៃរញាប់ជើងញាប់ដៃបន្តិចតែចូរកុំមានចិត្តលោភលន់ឱ្យសោះ ប្រយ័ត្នបែរជាកើតរឿងរ៉ាវអាចបង់ខាតលាភសក្ការៈវិញ ។ ចំពោះ គូស្វាមីភរិយាក្នុងរយៈពេលនេះមានសុភមង្គលនៅក្នុងគ្រួសារ ។

**ឆ្នាំមមី**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ ចំពោះគូស្នេហ៍នៅក្នុងរយៈពេលនេះប្រកបទៅដោយភាពផ្អែមដាក់គ្នាជានិច្ច ។

**ឆ្នាំមមែ**
រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការីកចម្រើនទៅមុខដោយសន្សឹមៗ។ ក្នុងរយៈពេលនេះ លោកអ្នកដែលប្រកបការងារ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្តិមមេដៃលើលិខិតស្នាមផ្សេងៗ ចូរពិនិត្យឱ្យល្អិតល្អន់ប្រយ័ត្នខាតបង់ទ្រព្យសម្បត្តិ ។

**ឆ្នាំវក**
រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការលូតលាស់រីកចម្រើនទៅមុខជាលំដាប់ ។ ក្នុងរយៈពេលទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ក៏អាចទទួលផលសម្រេចតាមបំណងប្រាថ្នាទាំងអស់ ។ ចំពោះគូស្នេហាដែលស្រឡាញ់គ្នាយូរមកហើយអាចគិតគូតរឿងរៀបអាពាហ៍ពិពាហ៍បាន ។

**ឆ្នាំរកា**
រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺនៅពេលទូទាត់បញ្ជីប្រាក់កាសផ្សេងៗ ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យសម្បត្តិច្រើន ។ ចំពោះគូស្នេហ៍ច្រើនមានការរកាំរកូសដាក់គ្នា ។

**ឆ្នាំច**
រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានភាពរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រឡាញ់កុំទៅញ៉ើកបើរពុកកុំទៅញយ ទើបចំណងស្នេហ៍អាចគង់វង្សយូរអង្វែង ។

**ឆ្នាំកុរ**
រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានភាពរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ។ ក្នុងរយៈពេលនេះ ចំពោះអាជីវកររមុននឹងទទួល ឬប្រគល់នូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី ។




## របៀបម៉ាស្សាម្រាមជើង

... ជើង គឺជាអវៈយវៈម្យ៉ាងដែលរងនឹងទម្ងន់សកម្មភាពរាងកាយពេញមួយថ្ងៃ ជាពិសេសរងនឹងសំពាធតឿ្យតនៃស្បែកជើងទៀតផង ។ ការកាត់ភាពស្អិតស្រពន់លើប្រអប់ជើង អ្នកអាចប្រើអំបិលធម្មតាប្រហែលជា១០០ក្រាម និងសូដ្យូមកាបូណាតប្រមាណ១ស្លាបព្រាបាយលាយទៅក្នុងទឹកក្តៅឧណ្ហៗ រួចដាក់ជើងត្រាំមួយស្របក់នោះអាការៈស្អិតស្រពន់នឹងបានធូរស្រាលទៀតផង ។

បន្ទាប់មកលាបប្រេងម្នាក់ ឬប្រេងផ្កាឈូករ័ត្នប្រើម្រាមដៃឈ្លីស្រាលៗ ក្រោយពេលប្រេងជ្រាបចូលស្បែកល្អហើយ ទើបលាងនឹងទឹកក្តៅធម្មតាចេញទុកជាការស្រេច ៕

## ទឹកដោះគោជូរជួយលុបស្នាមជ្រីវជ្រួញ



... ប្រសិនបើអ្នកកំពុងស្វែងរកមើលវិធីលុបបំបាត់ស្នាមជ្រីវជ្រួញនៅលើស្បែកនោះ យើងណែនាំឱ្យប្រើទឹកដោះគោជូរចំនួន២ស្លាបព្រាកាហ្វេ លាយជាមួយទឹកឃ្មុំសុទ្ធ២ស្លាបព្រាបាយ ស្រាក្រហមមួយស្លាបព្រាបាយ និងសូដា២ភាគ២កែវ ។ បន្ទាប់មកដាក់ទឹកកកឱ្យត្រជាក់បន្តិច និងក្លាជាភេសជ្ជៈម្យ៉ាងមានឱជារសឈ្ងុយឆ្ងាញ់ អាចជួយការពារបានទាំងអាការៈរបកស្បែកមុខយ៉ាងមានប្រសិទ្ធភាពបំផុត ៕



## ដោះស្រាយបញ្ហារោមរំខាន

●●●ជាការពិតណាស់ថា ពេលខ្លះរោមដែលដុះនៅកន្លែងដែលមិនប៉ុនប្រាថ្នា វានឹងក្លាយជាបញ្ហារារាំងដល់សោភ័ណភាពស្ត្រីក្នុងការបង្អួតឱ្យអ្នកដទៃបង្អួសកែវភ្នែកតាមសម្លឹងមើលរូបនាង ។

ការកំចាត់រោមក្រៅពីការប្រើប្រាស់វិធីកោស ហើយនោះ គឺនៅមានវិធីចំនួន២ថែមទៀត គឺដកដែលវិធីនេះហុចផលបានយូរអង្វែងក៏ពិតមែន តែប្រសិនបើអ្នកមិនអត់ទ្រាំបាននឹងអារម្មណ៍ឈឺទេនោះ យើងណែនាំអ្នកគួរតែងាកទៅពឹងផ្អែកលើក្រែមកំចាត់រោមទើបប្រសើរជាង ព្រោះវិធីនេះវាមិនធ្វើឱ្យឈឺសាច់ និងបានផលជាងវិធីកោរ ៕

## ទឹកដោះគោឆៅជួយថែសម្រស់ផ្ទៃមុខ

●●●ប្រសិនថ្ងៃណាមួយអ្នកឆ្លុះកញ្ចក់ឃើញថាកែវភ្នែកបែរជាអ័ព្វស្មុ មិនស្រស់ថ្លាដោយសារតែគេងមិនបានគ្រប់គ្រាន់ អ្នកអាចស្តារសភាពស្រស់ស្រាយនៃកែវភ្នែកឡើងវិញបាន ដោយមិនប្រើថង់តែឬត្រសក់ ។

វិធីលើកមកណែនាំ គឺជាវិធីងាយៗតាមបែបធម្មជាតិ ដោយគ្រាន់តែប្រើទឹកដោះគោឆៅមានរសជាតិសាបក្លាសេ្សឱ្យត្រជាក់ចាក់ដាក់ក្នុងកែវបន្តិច បន្ទាប់មកប្រើសំឡីផ្តិតឱ្យសើមតិចៗ យកមកបិទលើត្របកភ្នែករួចសម្ងំគេងរយៈពេល១០នាទី បន្ទាប់មកប្រើទឹកលុបលាងមុខតាមធម្មតាធានាថា កែវភ្នែកនេះនឹងជះចេញ



នូវរស្មីចិញ្ចាចចិញ្ចែងដូចដើមវិញមិនខាន ៕

## តមកពីទំព័រទី ១៣ ទម្រង់បោះឆ្នោត១០១៨នឹងត្រូវជំនួស...

លោក ទេព នីថា បានមានប្រសាសន៍ថា ការបោះឆ្នោតជ្រើសរើសសមាជិកព្រឹទ្ធសភាគ្រោងនឹងធ្វើនៅថ្ងៃទី២៩ ខែមករា ហើយការបោះឆ្នោតឃុំសង្កាត់នឹងធ្វើឡើងនៅថ្ងៃទី៣ មិថុនា ឆ្នាំ២០១២។

កាលពីមុនមានភាពខុសគ្នា (ក្នុងទម្រង់១០១៨)..។ ប៉ុន្តែយើងបានណែនាំអាជ្ញាធរក្នុង មូលដ្ឋានរួចហើយអំពីការទប់ស្កាត់ការលួចបន្លំការបោះឆ្នោតហើយ" ។

ទម្រង់១០១៨មានបញ្ជាក់ឈ្មោះ ថ្ងៃខែឆ្នាំកំណើត និងមានរូបថតរបស់សាមីខ្លួន ។ ទម្រង់នេះត្រូវបានចេញ និងបោះឆ្នោតដោយមេឃុំ ឬចៅសង្កាត់ ។

អ្នកសុំចុះឈ្មោះប្រើទម្រង់១០១៨ត្រូវតែចុះឈ្មោះដោយមានវត្តមានសាក្សីម្នាក់ ដែលអាចបញ្ជាក់អត្តសញ្ញាណ និងអស័យដ្ឋានរបស់អ្នកសុំទម្រង់នោះ ។ ទម្រង់នេះបន្ទាប់មកអាចត្រូវបានប្រើប្រាស់ដើម្បីចុះឈ្មោះបោះឆ្នោត និងក៏អាចប្រើបានដូចជាអត្តសញ្ញាណប័ណ្ណនៅថ្ងៃបោះឆ្នោតផងដែរ ។

បន្ទាប់ពីការបោះឆ្នោតជាតិខែកក្កដាឆ្នាំ២០០៨ គណបក្ស សម រង្ស៊ី បានអះអាងថា សន្លឹកឆ្នោតមិនបានការត្រូវបានបោះដោយមនុស្សមួយចំនួនដែលត្រូវបានចេញទម្រង់១០១៨ខុសច្បាប់ជូនដោយមេឃុំ ឬចៅសង្កាត់ ដែល៩៨ភាគរយនៅក្នុងចំណោមនោះ គឺជាសមាជិកគណបក្សប្រជាជនកម្ពុជា ។ នៅក្នុងករណីខ្លះឈ្មោះ និងថ្ងៃខែឆ្នាំកំណើតត្រូវបានគេកែតែម្តង ។

គណបក្ស សម រង្ស៊ី ពេលនោះបានស្នើឱ្យអ្នកមានទម្រង់១០១៨ ក្លែងបន្លំប្រគល់ទម្រង់នេះឱ្យខ្លួនជាថ្នូរនឹងប្រាក់សំណង៥០ដុល្លារ ។

លោក គឹម ចាន់ ជាអ្នកសម្របសម្រួលជាន់ខ្ពស់នៅគណៈកម្មាធិការសម្រាប់ការបោះឆ្នោតដោយសេរី និងយុត្តិធម៌ បានមានប្រសាសន៍ថា ការគ្រប់គ្រងតឹងរ៉ឹងជាងនេះលើការចេញទម្រង់នេះ គឺសំខាន់ណាស់ ត្រឹមតែមានទម្រង់នេះគឺមិនទាន់គ្រប់គ្រាន់ទេ ។

លោកបានមានប្រសាសន៍ថា អង្គការខុមហ្វ្រែល បានជំរុញគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតឱ្យដាក់ចេញនូវវិធានការថ្មី ដោយសារមានបញ្ហាមួយចំនួននៅក្នុងការប្រើទម្រង់១០១៨ក្នុងពេលកន្លងមក ។



ដោយត្រូវបានទាក់ទងតាមទូរស័ព្ទកាលពីម្សិលមិញ លោក សុន ឆ័យ សមាជិកសភាគណបក្ស សម រង្ស៊ី បានមានប្រសាសន៍ថា ទម្រង់១០១៨ តាមពិតមិនមែនមិនល្អទេ ប៉ុន្តែគឺការគ្រប់គ្រងទន់ខ្សោយទៅវិញទេធ្វើឱ្យគេប្រើវាខុសគោលដៅនោះ។

លោកបានមានប្រសាសន៍ថា "គណបក្សប្រជាជនកម្ពុជាមានលទ្ធភាពប្រើប្រាស់អាជ្ញាធរក្នុងមូលដ្ឋានដើម្បីបន្លំ (ក្នុងឆ្នាំ២០០៨) ពីព្រោះគ្មានការគ្រប់គ្រងត្រឹមត្រូវណាមួយត្រូវបានអនុវត្តទេ" ដោយបានបន្ថែមថា ការអនុវត្ត និងការគ្រប់គ្រងប្រសើរជាងមុននូវប្រព័ន្ធអត្តសញ្ញាណប័ណ្ណនឹងលុបបំបាត់ភាពចាំបាច់ក្នុងការប្រើទម្រង់១០១៨ និងទម្រង់ជំនួសដែលលោកបានមានប្រសាសន៍ថា ប្រហែលជាដូចគ្នានឹងទម្រង់១០១៨គ្រាន់តែខុសគ្នាត្រង់ឈ្មោះទម្រង់ ។

លោកបានមានប្រសាសន៍ថា "យើងនេះពាក់ព័ន្ធនឹងការទទួលខុសត្រូវតាមរដ្ឋធម្មនុញ្ញ ។ ពួកគេអាចហៅទម្រង់ថ្មីនេះថា ជាទម្រង់១០២១ ប៉ុន្តែវានៅតែដដែលហ្នឹង ។ បញ្ហាគឺនៅត្រង់ភាពចន្លោះប្រហោងដែលត្រូវបានបង្កើតឡើងដើម្បីទុកឱកាសឱ្យមានការលួចបន្លំ"៕

*(រាយការណ៍បន្ថែមដោយ Lauren Crothers)*

(Continued from page 11)

## Congresswonan Niki Tsongas,...

LOWELL,MA-June 28,2011-Congresswonan Niki Tsingas visites the Cambodian Mutual Assistance Association (CMAA).the Lowell non-prof it has provideducational, cultural,economic andsocial programs to help improve the quality of life from Cambodian Americans and other minorities in Lowell for 25 years. This visit builds on Congress-woman Tsongas´ regular outreach to the Cambodian community in Lowell to discuss issues of concern and to discuss ways her office can support their needs.

Services available through the CMAA include elderly outreach, health care scree nings,translation services, transportation to medical appointments, housing support, and GED assistance. However,budget cuts in recent years have for forced CMAA to reduce staff and have constrained program offerings. CMAA in also now using their expertise to assist a new influx of refugees from Burma and Iraq.

## តមកទំព័រទី ១១ ប្រទេសយេម៉ែន :"សង្ឃឹម...

ដោយគិតសម្រាប់ទៅដល់អនាគតក្មេងជំនាន់ក្រោយ ។ ព្រោះយុវជន គឺនៅក្នុងការគិត និងជាភក្តីពេញសិទ្ធិរបស់យើងតែម្តង។ ...យើងមិនត្រូវភ្លេចខ្លួនទេ? គឺយើងត្រូវពួតដៃគ្នា-ឱ្យបានទៅដល់រដ្ឋមួយដោយមានច្បាប់ស៊ីវិលត្រឹមត្រូវសម្រាប់ប្រជាជនគ្រប់ទីប៊ុយ (Tribu)-គឺរដ្ឋស៊ីវិល-ពហុទ្រីប៊ុយ-ច្បាប់តែមួយ។ ...យើងត្រូវតែមានការបោះឆ្នោតត្រឹមត្រូវឆាប់ៗនេះតែម្តង! យើងពុំត្រូវគិតថា ម្នាក់ៗមកពីភូមិឬទ្រីប៊ុយណា-ខេត្តណាទៅទៀត។ យើងជាយេម៉ែនីត-តែមួយរស់លើដី យេ ម៉ែន!។

នៅចំពោះភ្នែក IRAN-គេគិតថា ជាការ ខានដំដំណាំសម្រាប់សហរដ្ឋអាមេរិក ប្រទេសសេរីទាំងអស់។ ព្រោះយេម៉ែន-គឺជារបបប្រូ សហរដ្ឋអាមេរិក-កាលជំនាន់ AL Rida. ៕

## តមកទំព័រទី ០៦ "NATO ឬ OTAN ? តម្លៃនៃសន្តិសុខនៅអឺរ៉ុប...

ដែលជាទីតាំងយុទ្ធសាស្ត្ររបស់ OTAN ។

**អសមត្ថភាពយុទ្ធសាស្ត្រមានដូចជា :**

•Central Command OTAN មានការពិបាកក្នុងការបង្ហោះយន្តហោះប្រយុទ្ធឱ្យគ្រប់ចំនួនដែលគ្រោងទុក ១៥០ លើ៣០០ គ្រឿង ។

•កង្វះយុទ្ធភ័ណ្ឌគ្រាប់មីសស៊ីល និងគ្រាប់កាំភ្លើង ។

•ទ័ពអង់គ្លេសបានត្អូញត្អែរថា OTAN ពុំអាចឆ្លងផុតខែកញ្ញា ខាងមុខនេះទេ ក្នុងការវាយបណ្តេញហ្គាដាហ្វីឱ្យចុះចេញ ។

•គេអាចបង្ហោះបានត្រឹម១៦ អេលីកូ -តែ មាន៤ មកពីអង់គ្លេស ១២ ទៀត មកពីបារាំង ។

•គឺវាជាអសមត្ថភាពរបស់អឺរ៉ុប ក្នុងការការពារខ្លួនឯងដោយខ្លួនឯង ។

*វាមិនខុសពីនយោបាយលិបលរទៅមុខមិនទៅថយក្រោយមិនថយ ។ ចំពោះភ្នែក Robert Gates ករណីលីប៊ី គួរមានចំណងជើងថា :

*"ក្រុមហ្គាដាហ្វី-អូតង់ និងចំណោះជិះកឯង!"*




### ក្រសួងសុខាភិបាលសាធារណៈនៃទីក្រុងហ្វីឡាដែលហ្វា

# ព្រឹត្តិប័ត្រព័ត៌មានសុខភាព




សូមចម្អិនសាច់ប្រកបដោយសុវត្ថិភាពសម្រាប់បុណ្យអ៊ីស្ទ័ ផាសអូវ៍ និងពិធីបុណ្យនានិទាឃរដូវផ្សេងៗទៀត
និទាឃរដូវអាចជាពេលវេលាសម្រាប់អាហារនៃពិធីបុណ្យ ប៉ុន្តែសាច់ដែលមិនឆ្អិនល្អអាចបណ្តាលជាការបំពុលអាហារទៅវិញ។

ចម្អិនសាច់ហែម មាន់បារាំង សាច់ចៀម ឬសាច់ដ៏ទៃទៀតរបស់អ្នកប្រកបដោយសុវត្ថិភាពនៅឆ្នាំនេះ!
ប្រើ ទែម៉ូម៉ែត្រវ៉ាស់សីតុណ្ហភាពសាច់ហើយសូមប្រាកដថាលោកអ្នកចម្អិនសាច់ទាំងនេះ
រហូតដល់សីតុណ្ហភាពដ៏ត្រឹមត្រូវមួយនៅផ្នែកខាងក្នុងសាច់នោះ៖

- សាច់គិន និងសាច់លាយ 74° C
- សាច់គោ សាច់កូនគោ និងសាច់ចៀមស្រស់៖ 63° C
- សាច់មាន់ទា៖ 74° C
- សាច់ជ្រូក និងសាច់ហែមដែលមិនទាន់ចម្អិន 71° C
- សាច់ហែមដែលចម្អិនស្រាប់៖ 60° C





លោក ស៊ូ អេងឡេង

# បេសកកម្មមនុស្សធម៌ឆ្ពោះទៅកាន់ជំរំជនភៀសសឹកនៅខេត្តឧត្តរមានជ័យ

**ដោយ : អ៊ឹម លឿម**

•••ក្នុងនាមជាសមាជិកនៃគណកម្មការចម្រុះ និងក្នុងនាមជាអ្នកយកព័ត៌មានផងនោះ នៅព្រឹកថ្ងៃអាទិត្យ ទី១ ខែមិថុនា កន្លងមកនេះ យើង (អ៊ឹម លឿម) បានបំពេញនូវកតព្វកិច្ចដ៏ចម្បងមួយក្នុងការធ្វើ ដំណើរលើកំណាត់ផ្លូវដ៏វែងអន្លាយចេញពីខេត្តកំពង់ស្ពឺ ដែលជាខេត្តមួយពោរពេញទៅដោយដើមត្នោតដ៏ច្រើនជាងគេឆ្ពោះទៅកាន់ខេត្តឧត្តរមានជ័យ ដែលនៅទីនោះត្រូវបានគេដឹងថា មានជនភៀសសឹករាប់ពាន់គ្រួសារដែលពួកគាត់បានចាកចេញពីផ្ទះសម្បែងទីកាន់ទីដ្ឋានដែលពួកគាត់យល់ថា ជាកន្លែងមានសុវត្ថិភាព ។

គោលបំណងរបស់យើង គឺគ្មានអ្វីក្រៅអំពីកិច្ចការមនុស្សធម៌ឡើយ ព្រោះយើងជាខ្មែរមានបេះដូងជាខ្មែរមានឈាមជ័រជាខ្មែរ មានសន្ដានជាខ្មែរ មានសាវតាជាខ្មែរ... ហេតុនេះគឺចាំបាច់យើងត្រូវចេះជួយធុរៈគ្នាក្នុងខណៈដែលមនុស្សខ្មែរ ដូចគ្នាកំពុងមានទុក្ខអាសន្នអន់ក្រ...។ ក៏ប៉ុន្តែមុននឹងបន្តសាច់រឿងតទៅមុនទៀតនោះ ក្នុងនាមជាតំណាងពលរដ្ឋខ្មែរក្នុងសហគមន៍ហ្វីឡាដែលហ្វៀដែលបានចូលរួមធ្វើកិច្ចការមនុស្សធម៌នេះ សូមឆ្លៀតឱកាសសំដែងនូវអំណរគុណដ៏អនេកប្បការចំពោះសប្បុរសជនក្នុងសហគមន៍ដ៏តូចចង្អៀតមួយនេះ ដែលបានចូលរួមជួយរំលែកធ្វើវិភាគទានសប្បុរសធម៌ដល់ជនភៀសសឹកខ្មែរយើងនៅឯខេត្តឧត្តរមានជ័យតាមរយៈការធ្វើបុណ្យទក្ខិណាទានមួយកាលពីពេលកន្លងមកនេះ នៅឯវត្ត "ប៉ាលេលេយ្យ" នាទីក្រុងហ្វីឡាដែលហ្វៀខាងត្បូង ដែលគណកម្មការសម្រាប់បុណ្យនេះត្រូវបានបង្កើតឡើងដោយមានជាច្រើនក្រុម ច្រើនបក្សនយោបាយ និងជាច្រើនវត្តអារ៉ាម។ ទោះបីជាបច្ច័យដែលប្រមូលបាននៅសល់ត្រឹមតែ១៩៥០ដុល្លារក្ដី តែនេះបែរជាមានអត្ថន័យដ៏មហាសាលសម្រាប់បងប្អូនខ្មែរនៅក្នុងសហគមន៍ហ្វីឡាដែលហ្វៀដែលពោរពេញដោយក្ដីសណ្ដោស និងអាណិតស្រឡាញ់ដល់មាតុភូមិកំណើតរបស់ពួកគាត់ និងជាមនុស្សខ្មែរដូចគ្នា ។

ដោយមានការណែនាំពីលោក "ពិន សំខុន" អគ្គនាយកការផ្សាយនៃកាសែត "ខ្មែរប៉ុស្តិ៍" និងមានការឯកភាពពីគណកម្មការចម្រុះគ្រប់រូបផង ទើបយើងត្រូវបានទទួលភារៈជាអ្នកទទួលលុយទាំងនោះឆ្ពោះទៅកាន់ប្រទេសកម្ពុជា ដើម្បីធ្វើសកម្មភាពមនុស្សធម៌ដល់បងប្អូនជនភៀសសឹកខ្មែរយើងនៅឯខេត្តឧត្តរមានជ័យ ។ ធ្វើបុណ្យចូលឆ្នាំដំបូង (១៣ ខែមេសា) ជាថ្ងៃដែលយើងមានឈានជើងជាន់លើមាតុភូមិកំណើតជាលើកទី៤ក្នុងអំឡុងពេល៩ឆ្នាំ ដែលបានរស់នៅឯសហរដ្ឋអាមេរិក ។ ហើយនៅថ្ងៃដំបូងនោះ បន្ទាប់ពីបានងូតទឹកជម្រះកាយរួចរាល់ហើយ យើងក៏បានទូរស័ព្ទទៅកាន់អតីតអនិកជនខ្មែរ-អាមេរិកាំងម្នាក់ឈ្មោះ លោក "ស៊ូ អេងឡេង" ដើម្បីប្រគល់ថវិកាទាំង១៩៥០ដុល្លារជូនលោក ព្រោះលោកជាមនុស្សដែលមានការទុកចិត្តខ្ពស់ពីលោក "ពិន សំខុន" ប្រធានខ្មែរប៉ុស្តិ៍ ហើយលោកក៏ជាមិត្តភក្តិធ្លាប់ធ្វើការសង្គមជាមួយគ្នាកាលពីនៅប្រទេសបារាំង ជាពិសេសនោះគឺលោក អេងឡេង នេះហើយ ជាប្រធានមូលនិធិ "ឆីជី" ដែលមានន័យ



អ៊ឹម លឿម កំពុងចែកអំណោយ

ជាភាសាខ្មែរថា "មូលនិធិករុណាសង្គ្រោះ" ។ ដូចការរៀបរាប់របស់យើងនេះហើយ ទើបមានការណែនាំ ហើយនិងឯកភាពក្នុងការប្រគល់ថវិកាទាំងនោះទៅកាន់លោក អេងឡេង ក្នុងការចាត់ចែងទូទៅលើអំណោយមនុស្សធម៌ ។

ជាអកុសលក្នុងថ្ងៃបុណ្យចូលឆ្នាំខ្មែរនាពេលនោះ លោក អេងឡេង ពុំមានវត្តមាននៅភ្នំពេញឡើយ ដោយទទួលទូរស័ព្ទប្រាប់ថា "គាត់ចេញទៅក្រៅប្រទេស"។ ប្រមាណជាងមួយសប្ដាហ៍ក្រោយមក ទើបលោក អេងឡេង ទូរស័ព្ទមករកយើងវិញ ។ មួយថ្ងៃក្រោយមកទើបយើងធ្វើដំណើរទៅកាន់ផ្ទះរបស់លោកនៅឯភ្នំពេញ មុំស្តុបផ្សារអូរឬស្សី ដើម្បីផ្ទេរលុយទាំងនោះជូនលោកដោយមានលិខិតផ្ទេរប្រាក់ និងលិខិតទទួលដែលសរសេរដោយដៃ ។ លុះថ្ងៃបន្តបន្ទាប់មកទៀត យើងទាំងពីរនាក់បានទូរស័ព្ទទាក់ទងគ្នាជាញឹកញាប់ ដើម្បីស្វែងរករូបមន្តល្អណាមួយក្នុងការចែកអំណោយ ព្រោះ "ថវិកាមានចំនួនត្រឹមតែ១៩៥០ដុល្លារ រីឯជនភៀសសឹកមានចំនួនច្រើន"។ ទាំងអស់នេះជាចំណោទ និងជាបញ្ហាដែលយើងតែងតែពិភាក្សាគ្នាជាញឹកញាប់ ។ ក៏ប៉ុន្តែសម្រាប់យើងបានផ្ដល់នូវឱកាសគ្រប់យ៉ាងជូនលោក អេងឡេង ក្នុងការចាត់ចែងទិញសម្ភារៈសម្រាប់ជាអំណោយដល់ជនភៀសសឹកទាំងនោះ ពីព្រោះថ្វីបើជាអនិកជនខ្មែរនៅប្រទេសបារាំងពិតមែន ប៉ុន្តែបច្ចុប្បន្នលោកជាអាជីវកដ៏សម្បូរម្នាក់នៅឯភ្នំពេញ ដូច្នេះលោកអាចសិក្សាដឹងយ៉ាងច្បាស់អំពីតម្លៃទំនិញ ដែលត្រូវទិញស្របតាមតម្លៃទិញផ្សារ។

ទីបំផុតយើងក៏បានរកច្រកចេញដោយការទិញអង្ករ និងកៅស៊ូប៉ាតង់ សម្រាប់ជាអំណោយមនុស្សធម៌ ដោយផ្នែកខាងអង្ករជាស្បៀងរបស់បងប្អូនខ្មែរ នៅហ្វីឡាដែលហ្វៀ រីឯកៅស៊ូប៉ាតង់ជាអំណោយរបស់មូលនិធិ "ករុណាសង្គ្រោះ" ដោយមានលោក ស៊ូ អេងឡេង ជាប្រធានមូលនិធិ ហើយក៏បានសម្រេចយកថ្ងៃទី១ ខែឧសភា ជាថ្ងៃចេញដំណើរ ។

នៅថ្ងៃទី១នេះយើងពុំបានរួមដំណើរជាមួយ លោក អេងឡេង និងក្រុមរបស់លោកឡើយ ព្រោះដោយសាររថយន្តរបស់គាត់ចង្អៀតពេក ទើបយើងសម្រេចចិត្តជិះរថយន្តឈ្នួលដោយប្រើប្រាស់ថវិកាផ្ទាល់ខ្លួន ហើយណាត់ជួបគ្នានៅឯសៀមរាប ។ យើងបានសម្រាកមួយយប់នៅទីនោះ លុះព្រឹកឡើងចាប់ផ្ដើមចេញដំណើរតាំងពីព្រលឹមម៉ោង៦:០០ ដោយមានរថយន្តពីរគ្រឿង ។ ទីមួយគឺជារថយន្តផ្ទាល់ខ្លួនរបស់លោក អេងឡេង ជាប្រភេទ Pick up មួយបាំងកន្លះ និងមានមនុស្សបួននាក់នៅក្នុងនោះ ។ រីឯផ្នែកខាងក្រោយនៃរថយន្តត្រូវបានផ្ទុកទៅដោយកៅស៊ូប៉ាតង់យ៉ាងច្រើន ដែលត្រូវបានចងយ៉ាងណែន និងមានសុវត្ថិភាពបំផុត ។ ចំណែកឯទីពីរជារថយន្តដែលយើងជិះដោយមានមនុស្សបីនាក់ ហើយរថយន្តនេះត្រូវបានមូលនិធិ "ករុណាសង្គ្រោះ" របស់លោក អេងឡេង ជាអ្នកជួលឱ្យសម្រាប់យើងផ្ទាល់ ។

មកដល់ត្រង់ចំណុចនេះ យើងសូមបរិយាយ ជម្រាបមិត្តអ្នកអាន ក៏ដូចជាសប្បុរសជនដែលជា ម្ចាស់ខ្ញុំអំណោយថា គោលដៅចម្បងក្នុងបេសកកម្មមនុស្សធម៌នេះ **(តទៅទំព័រទី ០៧)**





ភៀសសឹកនៅឧត្តរមានជ័យកំពុងតែទទួលអំណោយពីអ្នកហ្វីឡា

